ខ្មែរប៉ុស្តិ៍ ស.រ.អា

KhmerPost USA

Printing The Cambodian World News

VOL. 05 ISSUE 78 FEB. 25th - MAC. 10th, 2011

សុបិន : (267) 253-3947, សែម : (781) 244-0522

MASSACHUSETTS
- LOWELL
- LYNN
- REVERE
- BOSTON
PENNSYLVANIA
RHODE ISLAND
NEW JERSEY

មាតិការឿង ទំព័រ



# លោក ហ៊ុន សែន ស្នើឱ្យមានការចុះហត្ថលេខា លើកិច្ចព្រមព្រៀងឈប់បាញ់ជាមួយថៃ

**ខ្មែរប៉ុស្តិ៍, វ៉ាន់នាថ :** ក្នុងសន្និសីទកាសែតនៅវិមានសន្តិភាពនៅព្រឹកថ្ងៃទី17 កុម្ភៈនេះ លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន បានស្នើឱ្យមានកិច្ចព្រមព្រៀងឈប់បាញ់រវាងកម្ពុជា និងថៃ ដោយមានអាស៊ានជាសាក្សី ។

លោក ហ៊ុន សែន លើកឡើងថា ចំណុចសំខាន់នៃអនុសាសន៍របស់ក្រុមប្រឹក្សាសន្តិសុខសហប្រជាជាតិ គឺឱ្យមានការឈប់បាញ់ជាអចិន្ត្រៃយ៍ ។ ដូច្នេះនៅពេលប្រជុំអាស៊ាន ខាងមុខលោកនាយករដ្ឋមន្ត្រីសុំឱ្យមានការចុះហត្ថលេខាលើការឈប់បាញ់រវាងរដ្ឋមន្ត្រីការបរទេសកម្ពុជា និងថៃដោយមានអាស៊ានជាសាក្សី បើអាចចុះហត្ថលេខាជាមួយក៏ល្អ ។ ក្នុងករណីនេះ កម្ពុជាស្នើ៤ចំណុច:

ទី1: កម្ពុជា និងថៃព្រមព្រៀងគ្នាឈប់បាញ់ជាស្ថាពរ និងអចិន្ត្រៃយ៍មានន័យថា កុំឱ្យមានកាំភ្លើងផ្ទុះ ។ ទី2: រក្សាស្ថានភាពទីតាំងឈរជើងដដែលតាមព្រំដែន ដោយមិនចល័តកម្លាំង រង់ចាំរហូតមានដំណោះស្រាយជាស្ថាពរលើការវាស់វែងបង្គោលព្រំដែន ។ ទី3: ភាគីទាំងពីរលើកទឹកចិត្តឱ្យមេបញ្ជាការជួបមុខពិភាក្សាគ្នាដើម្បីបន្ធូបន្ថយភាពតានតឹង ។ ទី4: សុំឱ្យមានការ



ត្រួតពិនិត្យការឈប់បាញ់រវាងបណ្តាប្រទេសអាស៊ាន ៥ទៀត ព្រោះឥឡូវចេះតែចោទគ្នាទៅវិញទៅមក ដូច្នេះកុំខ្លាចគេមកមើល ។ ប្រសិនបើថៃមិនទទួលយកកម្ពុជាសុខចិត្តទទួលយកកងទ័ពអាស៊ានឱ្យនៅលើទឹកដីរបស់ខ្លួនជាឯកតោភាគី ។ យើងនៅទីភ្លឺទាំងអស់គ្នាដោយមិនត្រូវខ្លាចទេ ។ នេះជាចំណុចដែលកម្ពុជាព្រៀងសម្រាប់កិច្ចប្រជុំអាស៊ានពេលខាងមុខ ។ ចំណុចទាំង4នេះ ត្រូវលោកនាយករដ្ឋមន្ត្រីផ្ញើទៅកាន់នាយករដ្ឋមន្ត្រីថៃរួចហើយដើម្បីឱ្យគិតទុកជាមុន ៕

# ប្រធានាធិបតីពីររូបវាសនាអាក្រក់ដូចគ្នា

នាដើមឆ្នាំ២០១១នេះ ប្រធានាធិបតីនៃប្រទេសដ៏ធំពីរ បានធ្លាក់ពីតំណែងដ៏យូរលង់របស់ខ្លួន ដោយកម្លាំងចលនាប្រជាជនដូចគ្នា គឺ១ លោក ហ្សីនអាល់អាប៊ីឌីនបិនអាលី នៃប្រទេសទុយនេស៊ី កាលពីថ្ងៃទី១៥ ខែមករា ឆ្នាំ២០១១ និងទី២ លោក អូស្នី មូបារ៉ាក់ កាលពីថ្ងៃទី១២ ខែមករា ឆ្នាំ២០១១នេះ។ អ្នកទាំងពីរបានកាន់តំណែងជាប្រធានាធិបតីប្រមាណ៣០ឆ្នាំម្នាក់។ ប្រជាពលរដ្ឋនៃសហគមន៍ខ្មែរជាច្រើនសម្តែងការចង់ឃើញព្រឹត្តិការណ៍របៀបគ្នានេះកើតឡើងនៅកម្ពុជាដែរ ដោយលោកនាយករដ្ឋមន្ត្រីខ្មែរ ហ៊ុន សែន បានកាន់តំណែងដ៏កាន់តែរឹងមាំនេះចំនួនលើសពី៣០ឆ្នាំហើយ ។ តើព្រឹត្តិការណ៍ដ៏គួរឱ្យជាទីរីករាយរបស់ប្រទេសទាំងពីរបានកើតឡើងរបៀបណា? ។

ទាំងពីរនាក់ជាអតីតនាយកទាហានដែលឡើងកាន់អំណាចដូចមេដឹកនាំប្រទេសអារ៉ាបឯទៀតដែរ ឃិនអាលី ឡើងជាប្រធានាធិបតី ប៊ូគីបា ហាប៊ិប ដោយរដ្ឋប្រហារគ្មានបង្ហូរឈាម។ រីឯ មូបារ៉ាក់ ឡើងជាប្រធានាធិបតីអេហ្ស៊ីប អេឌូអា សាដាដ ឆ្នាំ ១៩៨១ ដោយកូដកម្មយោធាបានធ្វើឃាតរូបលោក សាដាដ នាពេលដង្ហែរក្បួនមួយ។ អ្នកទាំងពីរសុទ្ធតែក្លាយទៅជាអ្នកកាន់អំណាចផ្តាច់ការ បន្ទាប់ពីប្រកាសការពារលទ្ធិប្រជាធិបតេយ្យដូចគ្នា។

**១- ទុយនេស៊ី** : ព្រឹត្តិការណ៍ដែលកើតឡើងបណ្តាលឱ្យប្រធានាធិបតី បិនអាលី មានវាសនា



ប្រធានាធិបតី បិនអាលី

អាក្រក់នោះ គឺក្រុមយុវជនដែលមិនហ៊ានបញ្ចេញមុខ ដោយក្លាយអំណាចសន្តិសុខរដ្ឋបាលទុយនេស៊ី បានប្រើបណ្តាញអ៊ីនធើណេត បញ្ចេញកំហឹងចំពោះការបាត់បង់ជីវិតនៃយុវជនអាយុ២៦ឆ្នាំ មូហាមេដ ប៊ូស៊ីស៊ី ដែលបានដុតខ្លួនឯង ពីព្រោះក្រុមប៉ូលិសបានចាប់ប្រមូលទំនិញ (តទៅទំព័រទី ១៤)

# អាប់ភិស៊ីត ច្រានចោលផែនការឈប់បាញ់ របស់កម្ពុជា និងតួនាទីអាស៊ាន



**ខ្មែរប៉ុស្តិ៍, វ៉ាន់នាថ :** នាយករដ្ឋមន្ត្រីថៃ អាប់ភិស៊ីត វេចាជីវ៉ា កាលពីថ្ងៃព្រហស្បតិ៍បានច្រានចោលភ្លាមៗនូវសំណើរបស់កម្ពុជាសម្រាប់កិច្ចព្រមព្រៀងឈប់បាញ់មួយរវាងប្រទេសទាំងពីរដោយលោកបាននិយាយថា វាលឿនពេកក្នុងការនិយាយអំពីចំណាត់ការណាមួយ ។

សម្តេចនាយករដ្ឋមន្ត្រីកម្ពុជាកាលពីថ្ងៃព្រហស្បតិ៍បានស្នើឱ្យថៃ និងកម្ពុជាចុះហត្ថលេខាលើកិច្ចព្រមព្រៀងឈប់បាញ់អចិន្ត្រៃយ៍មួយនៅពេលបណ្តារដ្ឋមន្ត្រីការបរទេសអាស៊ានជួបប្រជុំនៅក្រុងហ្សាការតា នៅថ្ងៃអង្គារសប្តាហ៍ក្រោយនេះ ។

តែ អាប់ភិស៊ីត បាននិយាយថា "យើងមិនមែនជាអ្នកចាប់ផ្តើមបាញ់មុនទេ ។ (តទៅទំព័រទី ០៤)

# ទូច បូរ៉ា :មេធាវីអន្តរជាតិប្រតិកម្មឆ្លើយតប ទៅនឹងរដ្ឋមន្ត្រីការបរទេសសៀម

•ទូច បូរ៉ា ជាមេធាវីម្នាក់ធ្វើការនៅក្នុងរដ្ឋាភិបាលប្រទេសអូស្ត្រាលី បានផ្តល់ឱ្យកាសែតខ្មែរប៉ុស្តិ៍នូវអត្ថបទឆ្លើយតបទៅនឹងរដ្ឋមន្ត្រីក្រសួងការបរទេសសៀមជុំវិញជម្លោះនៅតំបន់ប្រាសាទព្រះវិហារដែលរដ្ឋមន្ត្រីការបរទេស កាស៊ិត ភិរម្យ ផ្តល់ កិច្ចសម្ភាសន៍ដល់វិទ្យុសៀម ដែលតទៅនេះសូមអាននូវអត្ថបទដែលមានខ្លឹមសារទាំងស្រុងដូចតទៅនេះ :

Below is my response to "Thailand's Foreign Ministry statement concerning the Cambodian flag over Keo Sikha Kiri Svara Pagoda" published by The Nations, February 1, 2011. My comments begin with "Bora Touch" and the Thai Foreign Ministry's statement begins with "Thai FM"

Thai FM: The Foreign Ministry's statement concerning the Cambodian flag over Keo Sikha Kiri Svara Pagoda:

"With reference to the declaration of the Ministry of Foreign Affairs and international cooperation of the Kingdom of Cambodia dated January 28, 2011 regarding

(តទៅទំព័រទី ០៥)

# តើមានអ្វីប្លែកនៅហ្វីឡាដែលហៀរ

**I. វត្តបាលីល័យ រៀបចំគម្រោងធំមួយ**

វត្តចាស់ ឬវត្តបាលីល័យបានរៀបចំពិធីបុណ្យមាឃបូជាតាមប្រពៃណីដោយមានឧបាសកជើងវត្តជាច្រើនចូលរួមកាលពីថ្ងៃសៅរ៍ ទី១៩ ខែកុម្ភៈនេះ។ ភ្ជាប់ជាមួយគ្នានេះ ក៏មានប្រារព្ធពិធីបុណ្យផ្កាមួយ ដើម្បីរកបច្ច័យជួយចេញចំណាយធំដំរបស់ទីវត្តផងដែរ អាចារ្យវត្តបានប្រកាសបច្ច័យទានដែលទទួលបានចំនួន ៦,៤០០ដុល្លារ។



នៅមានកម្មវិធីពិសេសមួយទៀត ដែលព្រះគ្រូចៅអធិការ ឃឹម សុឃឿន បាននិមន្តព្រះគ្រូចៅអធិការវត្តត្រៃរតនារាម នៅឡូវែល សៅ ឃន ឱ្យចូលរួមផងដែរនោះ គឺការបង្ហាញនូវគម្រោងសាងសង់ទីវត្តបាលីល័យដ៏ធំមួយទៀត នៅខាងត្បូងឈៀងខាងជើងហ្វីឡាដែលហៀរ លើផ្លូវលេខ៥៨ ចែកជូនឧបាសកជើងវត្តឱ្យបានដឹងជឹងឮ ហើយជួយជាយោបល់។ គម្រោងដែលមានតម្លៃប្រមាណជា ៥លានដុល្លារ នៅលើទីធ្លាដ៏ធំទូលាយ នឹងត្រូវចំណាយនាពេលដ៏ខ្លីខាងមុខ ដើម្បីធ្វើឱ្យបានជាព្រះវិហារ សាលាធ្វើបុណ្យនានា ជារបងវត្ត ឬជាក្លោងទ្វារវត្ត ឬចំណតរថយន្ត។ល។ ប្រជាពលរដ្ឋជាឧបាសកជើងវត្ត មានសេចក្តីរីករាយ ហើយត្រៀមខ្លួនផ្តើមចាប់កុសលក្នុងសំណង់វត្តអារ៉ាមថ្មីនេះ។

**II. ពីជំនួយជនរងគ្រោះកោះពេជ្រ ទៅជំនួយដល់ជនភៀសខ្លួន :**

គណៈកម្មាធិការតំណាងឱ្យក្រុមនានានៃសហគមន៍ខ្មែរនៅហ្វីឡា បានជួបជុំគ្នានៅវត្តបាលីល័យនារសៀលថ្ងៃទី១៩ ខែកុម្ភៈនេះ ដើម្បីសម្រេចធ្វើពិធីបុណ្យផ្កាមួយនៅថ្ងៃទី១២ និង១២ ខែមីនា នាវត្តបាលីល័យ។ លោក ផល ឈឿន ប្រធានអង្គប្រជុំស្នើថា កាលពីដំបូងឡើយ យើងមានបំណងយកថវិកាទៅជួយជនរងគ្រោះនៃឧប្បត្តិហេតុស្ពានពេជ្រ ឥឡូវនេះព្រឹត្តិការណ៍បានកន្លងយូរបន្តិចទៅហើយ តើយើងគួរបង្វែរទិសជំនួយទៅជាជំនួយមនុស្សធម៌អ្វីផ្សេងបានដែរឬទេ? លោក ត្រៃ ហ៊ល បានលើកឡើងថា "ដោយសារការបាញ់គ្នានៅតំបន់ព្រំដែនប្រាសាទព្រះវិហាររវាងខ្មែរ-សៀម មានប្រជាពលរដ្ឋជាច្រើននាក់ បានភៀសខ្លួនពីភូមិស្រុកទៅកាន់តំបន់ដែលមានសុវត្ថិភាព យើងគួរជាបន្ទាបជួយដល់អ្នកទាំងនោះដែលកំពុងស្រេកឃ្លាន"...។ អង្គប្រជុំយល់ព្រមតាមសំណើ។

**កិច្ចប្រជុំថ្នាក់ដឹកនាំសហគមន៍នៅហ្វីឡា**



មានកិច្ចប្រជុំមួយនៅវត្តព្រះពុទ្ធរង្សី ស្តីអំពីការចូលរួមរបស់សហគមន៍នៅក្នុងជម្លោះខ្មែរ-ថៃ កាលពីថ្ងៃសៅរ៍កន្លងទៅ។

**III. សេចក្តីកែតម្រូវ :**

ប្រធានគណៈកម្មាធិការវត្តសុរិយារង្សី គឺលោក **ថាច់ ជិន** សុំឱ្យខ្មែរប៉ុស្តិ៍ កែតម្រូវនូវប្រយោគដែលនាំឱ្យខ្មែរមានការបែកបាក់គ្នា ដែលពុំមានជាបំណងរបស់វត្តសុរិយារង្សី។ ក្នុងអត្ថបទរបស់ អ៊ុម លឿម ខ្មែរប៉ុស្តិ៍លេខ៧៦ ដែលមានឈ្មោះថា "ក្រុមផ្សេងៗក្នុងសហគមន៍ខ្មែរហ្វីឡា ធ្វើបុណ្យរួមគ្នា..." ប្រយោគនិយាយថា "ចំពោះវត្តសុរិយារង្សី ស្ថិតនៅផងវិថី Rising Sun នាតំបន់ហ្វីឡាដែលហៀរខាងជើង ក៏ពុំបានចូលរួមក្នុងពិធីបុណ្យនោះដែរ ពីព្រោះពុំមានការឯកភាពរវាងក្រុមពុទ្ធបរិសុទ្ធចំណុះជើងវត្តជាមួយព្រះសង្ឃ ព្រោះព្រះសង្ឃបានឯកភាពក្នុងការធ្វើបុណ្យរួមគ្នានោះដែរ តែគណៈកម្មការវត្តពុំបានយល់ស្របឡើយ"។ លោកថា ថាច់ ជិន បានកែតម្រូវថា "វត្តសុរិយារង្សី មានសេចក្តីរីករាយនឹងធ្វើបុណ្យរួមគ្នានេះហើយ ក៏ប៉ុន្តែពេលនេះ ពុំអាចចូលរួមបាន ដោយសារវត្តសុរិយារង្សី បានធ្វើបុណ្យសម្រាប់ព្រឹត្តិការណ៍កោះពេជ្រនោះរួចទៅហើយ ពេលព្រឹត្តិការណ៍នោះកើតឡើងភ្លាម ហើយក៏មានអញ្ជើញញាតិមិត្តជាភ្ញៀវគ្រប់វត្ត គ្រប់សហគមន៍ដូចគ្នានេះដែរ..."។

ដោយឡែកមានសេចក្តីបញ្ជាក់មួយទៀតរបស់លោក ផល ឈឿន ជាប្រធានគណៈកម្មាធិការ ក្រុមប្រជុំសហគមន៍ខ្មែរ បាននិយាយប្រាប់ខ្មែរប៉ុស្តិ៍ថា ចំពោះការមិនចូលរួមរបស់គណបក្សប្រជាជននៅហ្វីឡានេះ គឺគេគ្រាន់តែសុំកុំឱ្យដាក់ឈ្មោះគណបក្សនៅក្នុងបញ្ជីរាយនាមអ្នកចូលរួមតែប៉ុណ្ណោះ បើមានការអញ្ជើញពេលណា គណបក្សប្រជាជន នឹងចាត់មនុស្សឱ្យចូលរួមជាមិនខាន"...។

ខ្មែរប៉ុស្តិ៍ សូមអភ័យទោសចំពោះប្រយោគដែលខុសបំណងអ្នកនិយាយ។

**IV. ចូលរួមនៅសមាគមខ្មែរ :**

អ្នកស្រី រ៉ង ស៊ន នាយិកាប្រតិបត្តិបានប្រកាសនៅក្នុងអ៊ីនធើណេត ថា "សមាគមខ្មែរ នឹងរៀបចំពិធីចូលឆ្នាំខ្មែរនៅថ្ងៃទី៩ ខែមេសា ឆ្នាំ២០១១ ពីម៉ោង៦:០០ដល់ម៉ោង១១:០០ នៅអាស័យដ្ឋាន PENN LANDING CATERENS 1301 South Colurnsus. Phia 19147 ។

សំបុត្រចូលរួមកំសាន្តទិញមុនថ្ងៃទី២១ ខែមីនា ឆ្នាំ២០១១ តម្លៃ ៥៥ដុល្លារ។ បើទិញក្រោយថ្ងៃនោះ តម្លៃ ៦៥ដុល្លារ។

នេះជាសេចក្តីអញ្ជើញដល់បងប្អូនខ្មែរទាំងអស់ឱ្យចូលរួមចំណែក។

**ទូរស័ព្ទសមាគមខ្មែរ (215) 324-4070.**

តមកទំព័រទី ០១

## អាប់ភិស៊ីត ច្រានចោលផែនការ...

វាលឿនពេកក្នុងការនិយាយអំពីការចុះហត្ថលេខាលើកិច្ចព្រមព្រៀងណាមួយ ។ យើងធ្វើអ្វីដែលប្រទេសផ្សេងទៀតនឹងធ្វើ... គឺថានៅពេលយើងស្ថិតក្រោមការវាយប្រហារឬត្រូវគេបាញ់មុនយើងបាញ់តប ។ យើងមានសិទ្ធិការពារអធិបតេយ្យភាពរបស់យើង" ។

អាប់ភិស៊ីត បាននិយាយទៀតថា ប្រទេសទាំងពីរដែលមានជម្លោះត្រូវធ្វើកិច្ចពិភាក្សា និងអាស៊ានអាចដើរតួជាអ្នកបង្កលក្ខណៈងាយស្រួលមួយ ។ អាស៊ានមិនមានតួនាទីលូកដៃក្នុងបញ្ហាដែលត្រូវពិភាក្សាដោយថៃ និងកម្ពុជា ហើយសំណើរបស់ ហ៊ុន សែន នៅតែមិនទាន់ច្បាស់ ។

ក្រុមប្រឹក្សាសន្តិសុខអង្គការសហប្រជាជាតិកាលពីថ្ងៃចន្ទបានអំពាវនាវឱ្យមានបទឈប់បាញ់អចិន្ត្រៃយ៍មួយរវាងថៃ និងកម្ពុជា និងបានទុកឱ្យអាស៊ានសម្របសម្រួលបញ្ចប់ជម្លោះរវាងប្រទេសទាំងពីរ ។

ទោះជាមានភាពតានតឹងព្រំដែនជំនួបមួយកាលពីថ្ងៃព្រហស្បតិ៍រវាងលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន និងឧបនាយករដ្ឋមន្ត្រីថៃ ត្រៃរ៉ុង ស៊ូវ៉ាន់ណាគីរី និងអនុរដ្ឋមន្ត្រីពាណិជ្ជកម្ម អាឡុងខន ផុនឡាប៊ូត នៅក្រុងភ្នំពេញ ត្រូវគេពណ៌នាថា មានភាពរស់រាយរាក់ទាក់ណាស់ ។

លោក ត្រៃរ៉ុង ដែលបានដឹកនាំគណៈប្រតិភូថៃមកចូលរួមការបើកពិព័រណ៍ពាណិជ្ជកម្មថៃ បាននិយាយថា លោក ហ៊ុន សែន បានស្នើលោកឱ្យបញ្ជូនសារទៅឱ្យ អាប់ភិស៊ីត ថា កម្ពុជាមានបំណងបញ្ចប់ជម្លោះព្រំដែន និងចង់សហការជាមួយថៃអំពីការងារកំណត់ព្រំដែនរួមគ្នាមួយ ៕

# កម្ពុជា និងថៃ ជួបគ្នានៅក្រុមប្រឹក្សាសន្តិសុខអង្គការសហប្រជាជាតិ

**ខ្មែរប៉ុស្តិ៍ : អ៊ិត សុខា**

•••ក្តីរំពឹងអន្ទសាររបស់ពិភពលោក ជាពិសេសប្រជាពលរដ្ឋខ្មែរជាម្ចាស់បណ្តឹងដាក់ជូនក្រុមប្រឹក្សាសន្តិសុខអង្គការសហប្រជាជាតិ ដើម្បីធ្វើការទប់ស្កាត់ការឈ្លានពានទឹកដីខ្មែរ ត្រង់តំបន់ប្រាសាទព្រះវិហាររបស់ភាគីសៀម ប៉ុន្តែលទ្ធផលនៃកិច្ចប្រជុំនេះភាគីកម្ពុជាបានអះអាងពីជ័យជំនះធំធេងក្នុងការយកជម្លោះទៅដោះស្រាយក្នុងយន្តការអាស៊ាន ប៉ុន្តែបញ្ហានេះ ក្រុមអ្នកវិភាគជាច្រើនយល់ថា ជាដំណើរចុះខ្សោយមួយនៃសមរភូមិការទូតរបស់កម្ពុជាដោយសារតែមិនអាចទាក់ទាញអារម្មណ៍អង្គការសហប្រជាជាតិឱ្យបញ្ជូនកងរក្សាសន្តិភាពមកតំបន់មានជម្លោះដូចការទាមទាររបស់លោកនាយករដ្ឋមន្ត្រីខ្មែរ ហ៊ុន សែន កាលពីពេលថ្មីៗនេះ ។

នៅក្នុងបុរីញូវយ៉ក សហរដ្ឋអាមេរិកបន្ទាប់ពីបញ្ចប់កិច្ចប្រជុំបិទទ្វារជិតរបស់ក្រុមប្រឹក្សាសន្តិសុខអង្គការសហប្រជាជាតិ កាលពីថ្ងៃទី14 ខែកុម្ភៈនេះ ដែលមានសមាជិក15ប្រទេសចូលរួមនោះ ប្រតិភូដែលមកពីភាគីកម្ពុជា-សៀម ត្រូវបានគេអនុញ្ញាតឱ្យឡើងថ្លែងពីហេតុផលនៃការវាយប្រយុទ្ធគ្នានៅតំបន់ប្រាសាទព្រះវិហារកាលពីដើមខែកុម្ភៈនេះ ពេលដែលភាគីទាំងចោទប្រកាន់គ្នាទៅវិញទៅមក ។ ទីបំផុតក្រុមប្រឹក្សាសន្តិសុខអង្គការសហប្រជាជាតិបានសម្រេចចិត្តចេញសេចក្តីថ្លែងការណ៍របស់ខ្លួនសូមឱ្យភាគីកម្ពុជា-សៀមបញ្ឈប់ការវាយប្រហារគ្នាជាអចិន្ត្រៃយ៍នៅតាមព្រំប្រទល់ដែនជម្លោះ ហើយជជែកពិភាក្សាគ្នាឱ្យបានពេញលេញដើម្បីដោះស្រាយជម្លោះក្នុងយន្តការអាស៊ាន ។

លោកឧបនាយករដ្ឋមន្ត្រី ហោ ណាំហុង

លោក កាស៊ិត ភីរម្យ

នៅក្នុងសេចក្តីសម្រេចរបស់ក្រុមប្រឹក្សាសន្តិសុខអង្គការសហប្រជាជាតិ គឺមិនបាននិយាយអំពីការបញ្ជូនក្រុមរក្សាសន្តិភាពក្នុងក្របខណ្ឌអង្គការសហប្រជាជាតិ ឬអ្នកសង្កេតការណ៍ផ្នែកយោធាអន្តរជាតិមកតំបន់ព្រំដែនមានជម្លោះ ដើម្បីមកចាំមើលបទឈប់បាញ់គ្នានោះទេ គឺជាខកចិត្តយ៉ាងខ្លាំងសម្រើមរបស់ភាគីកម្ពុជា ។ ក្រុមប្រឹក្សាសន្តិសុខអង្គការសហប្រជាជាតិបានបញ្ជាក់ថា មិនមានប្រភពព័ត៌មានឯករាជ្យណាមួយទេដើម្បីបញ្ជាក់ថា ការបាញ់ប្រយុទ្ធគ្នារវាងភាគីកម្ពុជា-សៀម នរណាផ្តើមមុន ដូច្នេះគេមិនអាចកំណត់ថា ភាគីណាមួយជាអ្នកខុសនោះឡើយ ប៉ុន្តែរឿងសំខាន់បំផុតអង្គការសហប្រជាជាតិ ចង់ឱ្យមានការឈប់បាញ់គ្នាជាអចិន្ត្រៃយ៍ដើម្បីផ្តើមដោះស្រាយជម្លោះព្រំដែនដោយសន្តិវិធី ។ នៅពេលចាកចេញពីអង្គប្រជុំភាគីសៀមដឹកនាំដោយ កាស៊ិត ភីរម្យ បានអះអាងថា ភាគីសៀមមិនពេញចិត្តការសម្រេចរបស់ក្រុមប្រឹក្សាសន្តិសុខអង្គការសហប្រជាជាតិទេ ព្រោះបញ្ហាជម្លោះជាមួយនឹងប្រទេសកម្ពុជាអាចដោះស្រាយបានតាមយន្តការទ្វេភាគី មិនគួរមានភាគីទីបីមកលូកដៃអន្តរាគមន៍នោះទេ ព្រោះវាអាចធ្វើឱ្យជម្លោះកាន់តែរីករាលដាលធំៗឡើង ។ ភាគីសៀមបានប្រឹងប្រែងពន្យល់ដល់ក្រុមប្រឹក្សាសន្តិសុខអង្គការសហប្រជាជាតិពីបុព្វហេតុរបស់ខ្លួនពាក់ព័ន្ធនឹងការប្រយុទ្ធគ្នាជាទ្រង់ទ្រាយធំចំនួន4ថ្ងៃចុងក្រោយកាលពីដើមខែកុម្ភៈកន្លងទៅនេះ ហើយបានសាទរចំពោះជោគជ័យរបស់ខ្លួនដែលរារាំងមិនឱ្យមានការបញ្ជូនកងរក្សាសន្តិភាព ឬអ្នកសង្កេតការណ៍ផ្នែកយោធាឯករាជ្យមកកាន់តំបន់ព្រំដែនដែលមានជម្លោះ ។ ភាគីកម្ពុជា បានប្រាប់ក្រុមអ្នករាយការណ៍ព័ត៌មាននៅក្រៅបន្ទប់ប្រជុំនៅទីក្រុងញូវយ៉កថា ការសម្រេចរបស់ក្រុមប្រឹក្សាសន្តិសុខអង្គការសហប្រជាជាតិ ធ្វើឱ្យកម្ពុជាខកចិត្ត និងសោកស្តាយយ៉ាងខ្លាំងដោយសារតែអង្គការសហប្រជាជាតិមិនបានបញ្ជូនកងរក្សាសន្តិភាពមកកាន់តំបន់មានជម្លោះតែកម្ពុជាបានគាំទ្រចំពោះសេចក្តីសម្រេចឱ្យមានការដោះស្រាយជម្លោះដោយសន្តិវិធីក្នុងក្របខណ្ឌតំបន់ ហើយអង្គការសហប្រជាជាតិមិនបានបិទទ្វារទេសម្រាប់ជួយអន្តរាគមន៍ដោះស្រាយជម្លោះនេះ ពេលដែលយន្តការអាស៊ានមិនបានទទួលលទ្ធផលជាផ្លែផ្កាដែលអាចចាត់ទុកជាជោគជ័យមួយធំធេងសម្រាប់កម្ពុជា ។

លោកស្រី ស៊ីហ្សា វីបេរ៉ូ វីយ៉ូទី ប្រធានក្រុមប្រឹក្សាសន្តិសុខអង្គការសហប្រជាជាតិ បានមានប្រសាសន៍ថា លោកស្រីចង់ឃើញភាគីកម្ពុជា-សៀមមានភាពអត់ធ្មត់ខ្ពស់បំផុតដើម្បីទប់ស្កាត់កុំឱ្យមានការផ្ទុះអាវុធតាមព្រំដែន ហើយបន្តពិភាក្សាដោះស្រាយតាមក្របខណ្ឌតំបន់ដោយសន្តិវិធី ។ លោកស្រីបានបញ្ជាក់ថា អង្គការសហប្រជាជាតិចង់ឃើញភាគីជម្លោះកម្ពុជា-សៀមចៀសវាងការបង្កមានភាពតានតឹងខ្លាំងឡើងថែមទៀត ដែលអាចធ្វើឱ្យរាំងស្ទះដល់កិច្ចចរចាដោះស្រាយបញ្ហាជម្លោះដោយសន្តិវិធី ។ លោកស្រីបានបញ្ជាក់បន្ថែមថា ភាគីជម្លោះទាំងពីរត្រូវអនុវត្តន៍ការឈប់បាញ់ទាំងស្រុង ដើម្បីបើកផ្លូវឱ្យប្រធានអាស៊ានជួយសម្របសម្រួលដោះស្រាយជម្លោះ ហើយក្រុមប្រឹក្សាសន្តិសុខក៏បានស្នើឱ្យភាគីកម្ពុជា-សៀមបន្តធ្វើកិច្ចសហប្រតិបត្តិការជាមួយគ្នាឈានទៅដល់ដោះស្រាយជម្លោះដោយសន្តិភាព ។ យ៉ាងណាក៏ដោយលោក ម៉ាទី ណាតាឡេកាវ៉ា ដែលជាប្រធានសមាគមអាស៊ាន និងជារដ្ឋមន្ត្រីក្រសួងការបរទេសឥណ្ឌូនេស៊ីបានបញ្ជាក់ថា យន្តការ ដោះស្រាយជម្លោះកម្ពុជាសៀមក្នុងក្របខណ្ឌអង្គការសហប្រជាជាតិមិនទាន់បិទទ្វារទេ ហើយរាល់លទ្ធផលនៃការដោះស្រាយជម្លោះអាស៊ាន ត្រូវរាយការណ៍ជូនអង្គការសហប្រជាជាតិគ្រប់ដំណាក់កាលទាំងអស់ ៕

# ទាហានសៀមបង្កើនទ័ពជាមួយនឹងយន្តយន្តហោះចម្បាំងទំនើប F16 ត្រៀមប្រយុទ្ធជាមួយកម្ពុជា

**ខ្មែរប៉ុស្តិ៍, មាជ សុវណ្ណារ៉ា** : យោងតាមកាសែតថៃបានអោយដឹងថា កងកម្លាំងប្រដាប់អាវុធភូមិន្ទថៃបានអនុម័តប្រើផែនការការពារជាតិឈ្មោះថា Chakrabongse Bhuvanart ដែលមានការចូលរួមពីទាហានមកពីកងកម្លាំងប្រដាប់អាវុធបីប្រភេទ ដើម្បីយាមព្រំដែនថៃ-កម្ពុជាចាប់ពីខេត្តស៊ីសាកេត ចាន់ថាប៊ូរី និងត្រាត ។

ប្រភពយោធាមួយបាននិយាយថា បញ្ជាការ ជាន់ខ្ពស់លោក សុងគិតទីហ្សាកហ្កា បាតារ៉ា បាន អនុម័តផែនការ Chakrabongse Bhuvanart សម្រាប់ជាយុទ្ធសាស្ត្រការពារជាតិនៅតំបន់ខាងកើត ។

ប្រភពបាននិយាយថា ទាហានថៃដែលត្រូវបានកេណ្ឌទៅដាក់ជិតតំបន់ 4,6គីឡូម៉ែត្រការជុំវិញប្រាសាទព្រះវិហារនោះ មានចំនួនប្រមាណ 15.000 នាក់ ។ នេះជាចំនួនប្រហាក់ប្រហែលទាហានកម្ពុជាដែលត្រូវបានដាក់ពង្រាយក្នុងតំបន់ ។

ក្រោមផែនការ Chakrabongse Bhuvanart កងកម្លាំងបូព៌ាថៃនឹងធ្វើសកម្មភាពតាមព្រំដែនក្នុងខេត្តស៊ីសាកេត និងប្រាជីនប៊ូរី ។ កម្លាំង ស៊ុនណារី នឹងទទួលខុសត្រូវបណ្តាខេត្តភាគឦសានជាមួយនឹងផែនការប្រតិបត្តិការព្រះវិហារ 54 (Phra Viharn 54 Operation Plan) ។

ចំណែកកងកម្លាំងម៉ារីនរបស់ទ័ពជើងទឹកក្នុងកងកម្លាំងការពារព្រំដែននៅចាន់ថាប៊ូរី និង ត្រាត ព្រមទាំងកងកម្លាំងប្រដាប់អាវុធផ្សេង ទៀតត្រូវបានដាក់ឱ្យត្រៀមខ្លួន ។ ជាសរុបទាហានម៉ារីន និងអាកាស23.000នាក់នឹងត្រូវដាក់ពង្រាយ ។

ប្រភពព័ត៌មានបន្តទៀតថា កងទ័ពអាកាសនឹងបញ្ជូនយន្តហោះប្រយុទ្ធទៅល្បាតតាមព្រំដែនក្នុងពេលគាំទ្រប្រតិបត្តិការជើងគោក ។ ទ័ពអាកាសអាចបញ្ជូនយន្តហោះ F.16 ចេញពីខេត្តណាខន រ៉ាតចាស៊ិម៉ា មកកាន់តំបន់ព្រំដែនជិតប្រាសាទព្រះវិហារនៅក្នុងខេត្តស៊ីសាកេត មិនដល់10នាទីផង ។

ឧត្តមសេនីយ៍ អ៊ិតថាផន ស៊ូបហាវង់ មេបញ្ជាការទ័ពអាកាសបាននិយាយថា ទោះជាកងកម្លាំងទ័ពអាកាសត្រៀមបញ្ជូនយន្តហោះ F.16 ក៏លោកជឿថា វានឹងមិនចាំបាច់ធ្វើ ដូច្នេះពីព្រោះការប្រឈមមុខរវាងប្រទេសទាំង2នៅត្រឹម "ការប៉ះទង្គិចតូចតាចប៉ុណ្ណោះ" ។ លោកជឿថា ភាគីទាំង2

សៀមរៀបចំសម្ភារៈយោធាសឹក និងបង្កើនកងទ័ពនៅតាមព្រំដែន

នៅអាចដោះស្រាយជម្លោះតាមការចរចាអហិង្សា ។

អំពីការប៉ះទង្គិចជាបន្តនៅតំបន់ជម្លោះរដ្ឋមន្ត្រីការពារជាតិ ប្រាវីត វង់ស៊ូវ៉ុន បាននិយាយថា កងកម្លាំងថៃនឹងបាញ់តបវិញនៅពេលទាហានកម្ពុជាបាញ់លើពួកគេដើម្បីការពារអធិបតេយ្យរបស់ប្រទេស ៕

តមកទំព័រទី ០១ **ទួច ប៊ូរ៉ា :មេធាវីអន្តរជាតិប្រតិកម្ម...**

the issue of the flag of the Kingdom of Cambodia that is flying over the "Keo Sikha Kiri Svara" Pagoda, the Ministry of Foreign Affairs of the Kingdom of Thailand wishes to state the following:

1. According to the Memorandum of Understanding between the Government of the Kingdom of Thailand and the Government of the Kingdom of Cambodia on the Survey and Demarcation of Land Boundary of 2000, the 1904 and 1907 Treaties and "other documents relating to the application" of both treaties are the relevant legal documents to determine the boundary line.

Thailand therefore does not accept the assertion by Cambodia that the 1:200,000 map is the basis for determining the boundary.

**BORA TOUCH**: The International Court of Justice (ICJ) in 1962 ruled that the 1:200,000 map, or the Dangrek Section or Annex I Map as known in the ICJ proceeding, (and all of the 1:200,000 maps) is valid and forms part of the 1904 and 1907 Siam - France (Cambodia) delimitation treaties. The Memorandum of Understanding on the Survey and Demarcation of Land Boundary of 2000 stipulates:

Article 1: The survey and demarcation of the land boundary between the Kingdom of Cambodia and the Kingdom of Thailand shall be jointly conducted in accordance with the following documents:

a) ... The Convention between France [Cambodia] and Siam [Thailand] modifying the stipulations of the Treaty of 3 October 1893, regarding the Territorial Boundaries and Other Arrangements, signed at Paris, 13 February 1904

b) ... The Treaty between the His Majesty the King of Siam and the President of the Republic of France, singed at Bangkok, 23 March 1907 ... and the Protocol Concerning the Delimitation of Boundaries and Annexed to the Treaty of 23 march 1907; and

c) Maps which are the results of the demarcation works of the Commissions of the Delimitation of the Boundary of the Indochina [Cambodia] and Siam ... set up under the Covnention of 1904 and the Treaty of 1907 between France [Cambodia] and Siam [Thailand] and other documents relating to the application of the Convention of 1904 and the Treaty of 1907 between France[Cambodia] and Siam [Thaiand].

The Terms of Reference and Master Plan for the Joint Survey and Demarcation of Land Boundary between Cambodia and Thailand (TOR) of 23 March 2003 stipulates:

1.1.3. Maps which are the results of the Demarcation Works of the Commissions of Delimitation of boundary between Indochina [Cambodia] and Siam [Thailand].. sep up under the Convention of 1904 and the Treaty of 1907 between France [Cambodia] and Siam [Thailand] (theferafter referred to as "the maps of 1:200,000") and other documents relating to the application of the Convention of 1904 and the Treaty of 1907 between France [Cambodia] and Siam [Thailand].

Paragraph 10 of the Terms of Reference emphasises:

"This TOR is without prejudice to the legal value of the previous agreements between France and Siam concerning the delimitation of boundary, nor to the value of the Maps of the Commissions of the Delimitation of Boundary between Indochina [Cambodia] and Siam [Thailand] sep up under the Convention of 13 February




1904 and the Treaty of 23 March 1907, reflecting the boundary line of Indochina and Siam" Clearly the maps referred to are the 1:200,000 map (s) which, as mentioned above, the ICJ in 1962 ruled to be valid and forms part of the 1904 (and 1907) treaties. Thailand is therefore not in a position to assert that the 1:200,000 maps (one of which is known as Dangrek Section or Annex I map in which the PreahVihear Temple is situated) are not valid. There is no legal basis for such an assertion and to make such an assertion would amount to saying that, in contravention of the UN Charter, Thailand does not accept and will not enforce the Judgment of the ICJ.

Thai FM: 2. Cambodia also admitted in the aforementioned declaration that the decision of the International Court of Justice (ICJ) of 1962 did not rule on the question of the boundary line between Thailand and Cambodia.

**Bora Touch**: Contrary to Thailand's assertion, in 1962 the ICJ ruled unambiguously that the 1:200,000 maps (the Dangrek Section or Annex I Map included) is valid and is a part of the 1904 and 1907 treaties. Since the ICJ accepted and ruled that the map(s), which is the result of the boundary demarcation of the French-Siamese Joint Commissions, is valid and a part the treaties, the ICJ decided that it was unnecessary to rule on the question of boundary because the matter was decided (the map was ruled to be valid). The question did not need an answer as it was determined by the map(s). As scholar Kieth Highet (1987) pointed out: "the Court held that since the location indicated in the map had been accepted, it was unncessary to examine the physical location of boundary as derived from the terms of the Treaty". The ICJ did rule on the boundary question by ruling that map was valid.

Thai FM: 3. Thailand maintains that the "Keo Sikha Kiri Svara" Pagoda is situated on Thai territory, and demands that Cambodia remove both the pagoda and the Cambodian flag flying over the pagoda. This is a reiteration of the many protests that Thailand has submitted to Cambodia regarding the activities carried out in the pagoda and the surrounding area, all of which constitute violations of sovereignty and territorial integrity of the Kingdom of Thailand.

**Bora Touch**: According to the 1:200,000 map (or the Dangkrek Section or Annex I map), the Preah Vihear Temple and the 4.6 sq km parcel of land undisputedly are inside Cambodian territory. Thailand and Cambodia agree that the "Keo Sikha Kiri Svara" Pagoda is situated in the 4.6 sqkm parcel of land.

Thai FM: 4. The Ministry reaffirms Thailand's commitment to resolving all boundary issues with Cambodia in accordance with international law through peaceful means under the framework of the Thai-Cambodian Joint Commission on Demarcation for Land Boundary (JBC). The determination of the boundary line in the area of the Temple of Phra Viharn [Preah Vihear Temple] is still subject to ongoing negotiation under the framework of the JBC."

**Bora Touch**: It is misleading for Thailand to say it applies international law in this regard. It obviously failed to perform the obligations as stipulated under the ICJ Judgment of 1962. It thus has violated article 94(1) of the UN Charter/. Cambodia complains to the UN Security Council for appropriate measures against Thailand: Art 94(2).

**Bora Touch, lawyer**

# ខ្មែរនៅឯនាយសមុទ្រនាំគ្នាធ្វើបាតុកម្មប្រឆាំងនឹងការឈ្លានពានរបស់សៀម

**ដោយ : អ៊ុំចសៀច**

វិវាទព្រំដែនភាគខាងលិចរវាងប្រទេសកម្ពុជាជាមួយប្រទេសសៀមបានអូសបន្លាយជិតបីឆ្នាំមកហើយ ពោលគឺបន្ទាប់ពីកម្ពុជាបានសម្រេចដាក់ប្រាសាទព្រះវិហារចូលជាសម្បត្តិបេតិកភណ្ឌពិភពលោក (World Heritage) នាថ្ងៃទី៨ ខែកក្កដា ឆ្នាំ២០០៨ កន្លងមកនេះ។ ជម្លោះដ៏រាំរ៉ៃនេះ បានបង្កឱ្យមានការផ្ទុះអាវុធដាក់គ្នា ព្រមទាំងបង្កឱ្យមានភាពល្អក់កករដល់ទំនាក់ទំនងនៃប្រទេសជាបងប្អូនជិតខាងនឹងគ្នា រហូតឈានដល់ការកាត់ផ្តាច់នូវចំណងការទូតមួយរយៈ។ ក្រៅពីនោះវិវាទដ៏រាំរ៉ៃដែលពិបាកនឹងរកឱសថមកព្យាបាលនេះ បានបង្កនូវក្តីព្រួយបារម្ភចំពោះប្រជាពលរដ្ឋស្លូតត្រង់នៃប្រទេសទាំងពីរដែលរស់នៅតាមបន្ទាប់ព្រំដែនកំពុងមានជម្លោះ។

ផ្តើមចេញពីការបង្កអធិករណ៍ពីសំណាក់កងទ័ពសៀមជាច្រើនលើកច្រើនគ្រាបែបនេះ ពលរដ្ឋខ្មែរទាំងក្នុង និងក្រៅប្រទេសបានបញ្ចេញនូវកំហឹងរបស់ខ្លួនចំពោះការឈ្លានពានរបស់សៀម តាមមធ្យោបាយផ្សេងៗមានជាអាទិ:តាមរយៈទំព័រកាសែត.ទូរទស្សន៍. វិទ្យុ. តាមប្រព័ន្ធសារអេឡិចត្រូនិច... និងបង្ហាញនូវជំហរគាំទ្រចំពោះរដ្ឋាភិបាលយ៉ាងពេញទំហឹងក្នុងការប្រើកម្លាំងទ័ពក្នុងនាមការពារបូរណៈភាពទឹកដីរបស់ខ្លួន។

ចំពោះពលរដ្ឋខ្មែរដែលកំពុងរស់នៅឯនាយសមុទ្រក៏មានការឈឺឆ្អាលនិងយកចិត្តទុកដាក់ខ្ពស់ចំពោះស្ថានការណ៍ដែលឈានដល់ចំណុចគួរឱ្យព្រួយបារម្ភ។

**នៅឯរដ្ឋវ៉ាស៊ីនតោន សហរដ្ឋអាមេរិក** សហគមន៍ខ្មែរ បានគៀរគរបង្កើតឱ្យមានក្បួនបាតុកម្មអហឹង្សាមួយក្នុងគោលបំណងជំរុញឱ្យប្រទេសសៀមបញ្ឈប់ជាបន្ទាន់ក្នុងការឈ្លានពានមកលើបូរណភាពដែនដីខ្មែរ ។



បាតុកម្មនេះត្រូវបានប្រារព្ធធ្វើឡើងនៅថ្ងៃសៅរ៍ទី២១ ខែកុម្ភៈកន្លងមកនេះ នៅឯតំបន់ White Center នាទីក្រុង Scattle ដែលជាតំបន់មួយសម្បូរណ៍ដោយពលរដ្ឋខ្មែររស់នៅ។ លោក ហង្ស សុខមករា ជាតំណាងក្រុមបាតុករបានប្រាប់ដល់ "ខ្មែរប៉ុស្តិ៍" ថា ក្បួនបាតករត្រូវបានចាប់ផ្តើមនៅម៉ោង១០ព្រឹក នឹងបញ្ចប់ទៅវិញនៅម៉ោង២រសៀល ដោយមានការចូលរួមពីសំណាក់ព្រះសង្ឃ និងគ្រហស្ថប្រមាណជាង១០០នាក់។

ចំពោះគោលបំណងក្នុងការធ្វើបាតុកម្មនេះ ត្រូវបានលោក មករា ឱ្យដឹងថាមានចំនួន៥ចំណុចសំខាន់ៗដែលមានខ្លឹមសារទាំងស្រុងជាអាទិ :

**១**-ទាមទារឱ្យមានសន្តិភាពដល់ប្រទេសកម្ពុជាក្នុងខណៈដែលកើត ឡើងនូវសង្គ្រាមរវាងប្រទេសកម្ពុជា និងប្រទេសសៀមក្នុងពេលថ្មីៗនេះ និងទាមទារឱ្យរដ្ឋាភិបាលប្រទេសសៀមបញ្ឈប់ការឈ្លានពានរបស់ខ្លួនព្រមទាំងគោរពនូវសេចក្តីសម្រេចរបស់តុលាការក្រុងឡាអេ ដែលបានប្រគល់ប្រាសាទព្រះវិហារមកជាសម្បត្តិបេតិកភណ្ឌរបស់ខ្មែរនិងពិពភលោក។

**២**-សំណូមពរឱ្យអង្គការសហប្រជាជាតិ ព្រមទាំងសហគមន៍អន្តរជាតិជាពិសេសប្រទេសហត្ថលេខីនៃសន្ធិសញ្ញាសន្តិភាពក្រុងប៉ារីសទាំង១៨យកសន្ធិសញ្ញានេះមកពិនិត្យសើរើឡើងវិញ ដើម្បីធានាឱ្យបាននូវឯករាជ្យជាតិ បូរណៈភាពទឹកដី ប្រជាធិប-តេយ្យ ការគោរពសិទ្ធិមនុស្ស នៅក្នុងប្រទេសកម្ពុជា។

**៣**- សំណូមពរឱ្យរដ្ឋាភិបាលសហរដ្ឋអាមេរិកដែលមានលោក បារ៉ាក់ អូបាម៉ា ជាប្រធានាធិបតី ជួយស្វែងរកសុខសន្តិភាពដល់ប្រទេសកម្ពុជា។

**៤**- សូមគោរពដល់វីរៈភាពពលរដ្ឋខ្មែរស្លូតត្រង់ដែលបានតស៊ូរស់នៅតាមតំបន់ព្រំដែនខ្មែរ-សៀម ហើយបានបាត់បង់អាយុជីវិតរបស់ខ្លួនដោយសារតែសង្គ្រាមនេះ។

**៥**- សូមគោរពដល់វីរៈភាព និងវិញ្ញាណក្ខ័ន្ធបុព្វបុរស និងទាហានខ្មែរដែលបានតស៊ូ និងលះបង់អាយុជីវិតក្នុងបុព្វហេតុការពារបូរណៈភាពទឹកដី និងការឈ្លានពានពីសំណាក់ប្រទេសជិតខាង។

សូមបញ្ជាក់ផងដែរថា ញត្តិមួយច្បាប់ក៏ត្រូវបានផ្ញើរទៅកាន់លោក បាន គីមូន អគ្គលេខាធិការរបស់អង្គការសហប្រជាជាតិនាថ្ងៃបន្ទាប់ផងដែរ។ ហើយក្រុមបាតករនឹងមានគំរោងធ្វើបាតកម្មជាបន្តបន្ទាប់រហូតល្ពឹកណាស្ថានការណ៍ពុំមានលក្ខណៈធូរស្រាលទាំងផ្នែកការទូត និងផ្នែកយោធា នេះជាការថ្លែងបញ្ជាក់ពីលោក ហង្ស សុខមករា ។

**ងាកមកក្រឡេកមើលនៅឯញូវយ៉ក** ឯណោះវិញ ក្នុងខណៈដែលមានកិច្ចប្រជុំបិទទ្វារជិតរបស់ក្រុមប្រឹក្សាសន្តិសុខអង្គការសហប្រជាជាតិ ស្តីពីជម្លោះខ្មែរ-សៀម កាលពីថ្ងៃច័ន្ទទី១៤ខែកុម្ភៈកន្លងមកនេះ ដែលមានសមាជិកចូលរួមចំនួន១៥ប្រទេសក៏មានក្បួនបាតុកម្មតូចមួយនៅពីមុខស្នាក់ការអង្គការសហប្រជាជាតិ ដែលគោលបំណងចម្បង គឺគ្មានអ្វីក្រៅពីស្នើដល់អង្គការសហប្រជាជាតិឱ្យជួយអន្តរាគមន៍ដល់វិវាទដ៏ទុំជោររវាងកម្ពុជា-សៀម និងទាមទារប្រាថ្នាសុខសន្តិភាពនោះឡើយ។

លោក ទ្រឹង ម៉ានរិទ្ធ ជាខ្មែរកម្ពុជាក្រោម និងជាអ្នកដឹកនាំក្បួនបាតុកម្មនេះ បានផ្តល់កិច្ចសម្ភាសន៍តាមទូរស័ព្ទដល់ "ខ្មែរប៉ុស្តិ៍" នាពេលថ្មីៗកន្លងមកនេះថា " នេះអាចហៅថា បាតុកម្មក៏ បានព្រោះពួកយើងមានចំនួនត្រឹមតែជាង២០នាក់ប៉ុណ្ណោះ ហើយម្នាក់ៗសុទ្ធតែមានព្យួរបដានៅនឹងករ ព្រមទាំងមានរូបភាពនៃការបាញ់ប្រហារមកលើប្រាសាទព្រះវិហារ

**(តទៅទំព័រទី ១២)**

# កិច្ចសម្ភាសន៍ឯកឧត្តម សម រង្ស៊ី ជាមួយនឹងវិទ្យុបារាំងអន្តរជាតិ កាលពីថ្ងៃទី២៨ ខែមករា ឆ្នាំ២០១១

**(តពីលេខមុន)**

លោកតាសីនសាន។ ដូច្នេះគណបក្ស សមរង្ស៊ី ក៏ត្រូវប្រុងប្រយ័ត្នពីព្រោះគណបក្ស សមរង្ស៊ី ពីមុនឈ្មោះគណបក្សជាតិខ្មែរ តែគេលួចឈ្មោះគេបំបែកធ្វើឱ្យ



គណបក្សជាតិខ្មែរមិនអាចឈរឈ្មោះក្នុងការបោះឆ្នោតបានកាលពីឆ្នាំ១៩៩៨ ទើបគណបក្សជាតិខ្មែរប្តូរឈ្មោះមកគណបក្ស សមរង្ស៊ី ។ ដូច្នេះយើងត្រូវតែប្រុងប្រយ័ត្នត្រូវមានស្មារតីទទួលខុសត្រូវ កុំឱ្យគេបំបែក កុំឱ្យគេលួចប្លន់ឈ្មោះគណបក្ស ហើយកុំឱ្យគេធ្វើឱ្យគណបក្សដែលតំណាងឱ្យសេចក្តីសង្ឃឹមនៃប្រជារាស្ត្រខ្មែរចុះខ្សោយ ។

**សំនួរ** : តែលោក កឹម សុខា បានបញ្ជាក់រួចហើយថាការដែលបន្តរក្សាឈ្មោះគណបក្ស សមរង្ស៊ី ជាគណបក្សរួមគឺជាឧបសគ្គនៃការបង្រួបបង្រួមអ្នកប្រជាធិតេយ្យដែលមិនចង់ធ្វើនយោបាយនៅក្រោមផ្លាកបុគ្គល ។

**ចំលើយ** : វាមានរូបមន្តណាផ្សេងទៀតដែលធានាបានថា ចលនាប្រជាធិបតេយ្យមិនត្រូវមិនអាចគេមកបំបែកគេមកលួចឈ្មោះបានពេលនោះ យើងទទួលយករូបមន្តណាដែលធានានៃស្ថេរភាព និងនិរន្តរភាពនៃចលនាប្រជាធិតេយ្យ ។

**សំនួរ** : ដូចដែលឯកឧត្តមបានជ្រាបជាពតិមានកន្លងមកអំពីការយាងប្រឡប់ចូលឆាកនយោបាយជាថ្មីរបស់ព្រះអង្គម្ចាស់នរោត្តម រណឫទ្ធិ ថ្លែងតាមវិទ្យុបារាំងអន្តរជាតិលោក កឹម សុខា មិនបានទាត់ចោលទាំងស្រុងទេអំពីសម្ពន្ធភាពគណបក្សសិទ្ធិមនុស្ស និងគណបក្សនរោត្តម រណឫទ្ធិ នៅក្នុងករណីណាដែលសម្ព័ន្ធភាពជាមួយគណបក្ស សមរង្ស៊ី មិនអាចទៅរួច ។ ចុះចំណែកគណបក្ស សមរង្ស៊ី វិញ?

**ចំលើយ** : ខ្ញុំមានការសោកស្តាយដែលបានឮព្រះអង្គម្ចាស់នរោត្តម រណឫទ្ធិ បានទទួលស្គាល់ ហើយបានអបអរសាទរថ្ងៃ៧ ខែមករា ដែលជាថ្ងៃខួបយួនឈ្លានពានប្រទេសកម្ពុជា ខ្ញុំសូមរំលឹកថា កាលពីយើងតស៊ូក្នុងទសវត្សឆ្នាំ១៩៨០គឺយើងប្រឆាំងយួនឈ្លានពាន គឺយើងប្រឆាំងថ្ងៃ៧ ខែមករា នេះតែម្តង តែហេតុអ្វីបានជាព្រះអង្គម្ចាស់នរោត្តម រណឫទ្ធិ បែរទៅជាក្បត់ឧត្តមគតិរបស់ខ្លួន ហើយបែរទៅជាក្បត់វិញ្ញាណក្ខន្ធអ្នកតស៊ូរាប់ពាន់អ្នកដែលបានបូជាជីវិតដើម្បីដេញយួនឈ្លានពានបើយើងដឹងថាយើងក្បត់បែបនេះ រឿងអីយើងទៅបបួលគេស្លាប់ បបួលគេទៅតស៊ូប្រឆាំងយួន ។

**សំនួរ** : ឯកឧត្តមនៅមិនទាន់បានឆ្លើយនូវសំនួរខ្ញុំទេពីបំណងរបស់លោក កឹម សុខា ដែលចង់ចងសម្ព័ន្ធភាពជាមួយគណបក្ស នរោត្តម រណឫទ្ធិ។

**ចំលើយ** : នរណាចង់ធ្វើអីធ្វើទៅតែខ្ញុំតំណាងឱ្យគណបក្ស សមរង្ស៊ី ខ្ញុំមានគោលការណ៍គោលការណ៍ដែលមិនច្បាស់លាស់គោលការណ៍ដែលក្បត់ឧត្តមគតិដើមរបស់ខ្លួន ខ្ញុំមិនចូលជាមួយដាច់ខាត។

**សំនួរ** : មុននឹងចាប់អារម្មណ៍អំពីស្ថានភាពរបស់ឯកឧត្តមផ្ទាល់ ខ្ញុំចង់ផ្តោតបន្តិចអំពីស្ថានភាពរបស់គណបក្សប្រឆាំងនៅកម្ពុជា។ ជាទូទៅ គណបក្សប្រឆាំងតែងតែចោទគណបក្សកាន់អំណាចថា ជាអ្នកបំបែកបំបាក់ខ្លួន។ ចំពោះឯកឧត្តមផ្ទាល់ តើបក្សប្រឆាំងចុះខ្សោយ ឬបែកបាក់ដោយសារតែគំនាបពីគណបក្សកាន់អំណាច ឬមួយក៏ថាយុទ្ធសាស្ត្ររបស់គណបក្សប្រឆាំងខ្លួនឯងគ្មានប្រសិទ្ធិភាព ឬមួយក៏នៅស្ទើរ?

**ចំលើយ** : អ្នកណាថាបក្សប្រឆាំងចុះខ្សោយបក្សប្រឆាំងដទៃទៀតខ្ញុំមិនចង់និយាយទេ តែចំពោះគណបក្ស សម រង្ស៊ី គឺឡើង ឡើងជានិច្ច គឺពីមួយឆ្នាំទៅមួយឆ្នាំពីការបោះឆ្នោតមួយទៅការបោះឆ្នោតមួយចំនួនសន្លឹកឆ្នោត ចំនួនតំណែងអាសានៈនៅគ្រប់ជាន់ថ្នាក់នៃស្ថាប័នរដ្ឋកើនឡើងជានិច្ច ដូច្នេះគណបក្ស សមរង្ស៊ី គឺបន្តចរន្តរបស់ខ្លួន ចរន្តបង្រួបបង្រួមជាតិ ដើម្បីដណ្តើមយកជ័យជំនះជូនប្រជារាស្ត្រឱ្យមានការផ្លាស់ប្តូរនៅប្រទេសកម្ពុជារៀបចំប្រទេសឡើងវិញឱ្យមានសិទ្ធិសេរីភាពពេញលេញឱ្យមានភាពជឿនលឿន ធ្វើម៉េចឱ្យកូនខ្មែរមានអនាគតភ្លឺថ្លាគ្រប់ៗគ្នា ។

**សំនួរ** : នៅថ្ងៃទី១៦ ខែកុម្ភៈខាងមុខតុលាការកំពូលក្រុងភ្នំពេញបានចេញដីកាកោះហៅឯកឧត្តមឱ្យចូលបង្ហាញខ្លួន ដើម្បីបំភ្លឺជុំវិញសំណុំរឿងដកបង្គោលព្រំដែនក្នុងខេត្តស្វាយរៀង សំណុំរឿងដែលឯកឧត្តមត្រូវបានតុលាការក្រុងភ្នំពេញផ្តន្ទាទោសដាក់ពន្ធធានាគារសរុបចំនួនដប់ពីរឆ្នាំ អ្វីទៅជាចម្លើយរបស់ឯកឧត្តមចំពោះដីកាកោះហៅរបស់តុលាការកំពូល?

**ចំលើយ** : ខ្ញុំមិនយកចិត្តទុកដាក់ចំពោះតុលាការឡប់ឡែ តុលាការអាយ៉ងហ្នឹងទេ ពីព្រោះរឿងនេះជារឿងនយោបាយមិនមែនរឿងបុគ្គល មិនមែនរឿងសមរង្ស៊ី ទេ ខ្ញុំឱ្យមេធាវីខ្ញុំធ្វើអីធ្វើទៅចំពោះខ្ញុំ ខ្ញុំគ្មានជំនឿទាល់តែសោះចំពោះតុលាការអាយ៉ងបច្ចុប្បន្នដំណោះស្រាយគឺនៅថ្នាក់លើដំណោះស្រាយគឺដំណោះស្រាយនយោបាយថ្នាក់ជាតិ និងថ្នាក់អន្តរជាតិ ។

**សំនួរ** : មកទល់ពេលនេះគឺរយៈពេលជាងមួយឆ្នាំមកហើយ ដែលឯកឧត្តមបានភៀសខ្លួនរស់នៅក្រៅប្រទេស និងបន្តធ្វើការតាមទូរសព្ទ័ ឬតាមវីដេអូ conference ។ ការបោះឆ្នោតកាន់តែខិតជិតមកដល់ហើយឆ្នាំ២០១២ជាការបោះឆ្នោតជ្រើសរើសក្រុមប្រឹក្សាឃុំសង្កាត់ និងឆ្នាំ២០១៣ ជាការបោះឆ្នោតសកលជ្រើសតាំងតំណាងរាស្ត្រថ្មី តើអាចមានដំណោះស្រាយអ្វីខ្លះដើម្បីឱ្យប្រធានគណបក្ស សមរង្ស៊ី អាចវិលចូលស្រុកវិញបាន?

**ចំលើយ** : ខ្ញុំជឿថានឹងមានដំណោះស្រាយ ពីព្រោះ២ឆ្នាំ ៣ឆ្នាំទៀត វានៅយូរណាស់ហើយដំណោះស្រាយនយោបាយអាចមានគ្រប់ពេលវេលា ដូចយើងបានឃើញកាលពីអតីតកាលថ្មីៗនេះដែលអ្នកនយោបាយអ្នកប្រឆាំងពិតប្រាកដ គឺតែងតែគណបក្សកាន់អំណាចរករឿងជានិច្ចតែដោយសារមានសម្ពាធពីអន្តរជាតិជាពិសេសគឺមានដំណោះស្រាយនយោបាយ ហើយទីបញ្ចប់គឺមានប្រធានគណបក្សធំៗចូលរួមក្នុងការបោះឆ្នោតជានិច្ច ។

**សំនួរ** : តើឯកឧត្តមបានត្រៀមខ្លួនរួចហើយឬនៅដើម្បីទទួលយកលក្ខខណ្ឌណាមួយ ដែលអនុញ្ញាតឱ្យឯកឧត្តមអាចត្រឡប់ទៅធ្វើការបំរើប្រជាជននៅក្នុងស្រុក? ។

**ចំលើយ** : អត់មានលក្ខខណ្ឌអីទេ លក្ខខណ្ឌគឺគ្រាន់តែទាមទារឱ្យអ្នកដឹកនាំប្រទេសកម្ពុជាឱ្យស្រលាញ់ជាតិពិតប្រាកដឱ្យបំរើខ្មែរពិតប្រាកដ កុំបំរើយួន ត្រូវតែហ៊ានការពារទឹកដីខ្មែរ កុំឱ្យយួនឈ្លានពានចេះតែលេបត្របាក់ដូចសព្វថ្ងៃទៀត ៕ **-ខ្មែរប៉ុស្តិ៍-**

# អាថ៌កំបាំង និងសិល្បៈនៃជីវិត
# SECRET AND ART OF LIVING



(តមកពីលេខមុន)

រៀបរៀងដោយ
លោក ម៉ៅ ច័ន្ទសំណុំ

●ការរក្សាសីល ប្រតិបត្តិសមាធិអាចញុំាងឱ្យថាមពលកាមគុណពីកម្លាំងជំរុញនៃការត្រេកត្រអាលក្នុងកាមក្លាយមកជាថាមពលបំរើសុខភាពភាពសកម្មនៃការត្រិះរិះពិចារណា និងផ្លូវចិត្ត (Transformation of sexual energy into spiritual energy ) ។

៥- ពុំសេពគ្រឿងស្រវឹង គ្រឿងញៀន ។ ដោយឡែកក្នុងព្រហ្មញ្ញសាសនាក្នុងចំណុចទី៥នេះដែរ គេប្រើអត្ថន័យខុសប្លែកពីពុទ្ធសាសនា ដោយថែងថា «ប្រតិបត្តិការដាក់ទាន ជំរះចិត្តកំណាញ់ » ឬការជំរះចិត្ត ពុំឱ្យជាប់ជំពាក់ញៀននឹងកម្មសិទ្ធណាដែលពុំចាំបាច់ ។ ខ្ញុំធ្លាប់ឮពុទ្ធសាសនិកនិយមប្រើពាក្យថា «សីល និងទាន » ។

សីលទាំង៥យ៉ាងនេះ ជាសីលធមិសាកលដែលយើងពិនិត្យឃើញនៅគ្រប់សាសនានានា និងសីលធមិទូទៅក្នុងសម័យទំនើបយើងនេះ ។ ការរស់ជាមនុស្សធម្មតា បើរក្សាបានប៉ុណ្ណេះ យើងនឹងទទួលលទ្ធផលភ្លាមៗ ពោលគឺភាពស្ងប់ក្នុងចិត្ត សុខសប្បាយ ទទួលការទុកចិត្តពីអ្នកជុំវិញ ទទួលការរាប់អាន រាក់ទាក់មេត្រីភាពពីមជ្ឈដ្ឋានជុំវិញ នាំមកនូវភាពចំរើនរុងរឿង ។ម្យ៉ាងទៀត បើយើងសាបព្រួសចិត្តអកុសលដូចជាកំហឹងៗនឹងត្រឡប់មកយើងវិញ ។ បើយើងសាបព្រួសមេត្តាករុណា នោះមេត្តា និងករុណានឹងវិលមករកយើងវិញ ។ នេះជាច្បាប់ ពុំចាំបាច់មានសរសេរក្នុងក្បួនឡើយ វាមានថាមពល និងប្រតិកម្មផុះចេញពីធម្មជាតិដោយឯកឯង ។ជនណាប្រត្តិបត្តិ ឬប្រព្រឹត្តបែបណានោះ នឹងទទួលផលយ៉ាងពិតប្រាកដ នេះជាយុត្តិធិមដែលមានបង្កប់ក្នុងច្បាប់ធម្មជាតិ ។

ខ្ញុំសូមកត់សំគាល់ចំណុចដូចខាងក្រោមតទៅនេះ:

-ក្នុងប្រព័ន្ធប្រតិបត្តិព្រះពុទ្ធសាសនា ការអនុវត្តន៍រក្សាសីលមានតាមលំដាប់ និងកិរិត : មានសីល៥ សីល៨ សីល១០ (តាយាយចំណុះជើងវត្ត) និងសីល ២២៧ (សំរាប់ព្រះសង្ឃ) ។

ក្នុងការប្រព្រឹត្តិជាក់ស្តែង ទាមទារឱ្យយើងម្នាក់ៗពិនិត្យខ្លួនឯង និងហាត់ពត់កាយ វាចា និងចិត្តតាមរូបភាពផ្ទុយ : បើចង់រំដោះខ្លួនពីចិត្តកំណាញ់ យើងត្រូវហាត់ធ្វើទាន ធ្វើអំណោយ ដោយគ្មានលក្ខខ័ណ្ឌ គ្មានចង់បានសំណងមកវិញ។ បើចង់រំដោះពីចិត្តច្រណែន និន្ទា ឈ្នានីស ការស្អប់ខ្ពើម គំនុំគំគួន កំណាច សាហាវឃោរឃៅ យើងត្រូវហាត់ផ្សាយមេត្តាករុណា សន្តោសត្រាប្រណី (Loving kindness)ដល់មនុស្សសត្វជុំវិញពុំរើសមុខ ឋានៈ ក្រុមពួកឡើយ ។ គួរហាត់រំលឹកជារឿយៗ នូវអង្គធមិដ៏ខ្ពង់ខ្ពស់ ព្រហ្មវិហារធមិទាំង៤យ៉ាងគឺ : មេត្តា ករុណា មុទិតា និង ឧបេក្ខា ។ បើចង់រំដោះខ្លួនពីភ្លើងកំហឹងលើនរណាម្នាក់ ឬហេតុការណ៍អ្វីមួយ យើងត្រូវហាត់រំលឹករំលេចឡើងក្នុងចិត្តអំពីគុណសម្បត្តិ ការដឹងគុណ (gratitude) ដល់បុគ្គល ឬហេតុការណ៍ទាំងអស់នោះ។ បើចង់រំដោះខ្លួនអំពីការភ័យខ្លាច ព្រួយបារម្ភនានា យើងត្រូវរំលឹកជារឿយៗនូវអំណាចតេជះដ៏អស្ចារ្យនៃព្រះពុទ្ធ ព្រះធមិ ព្រះសង្ឃ ចូរយកធាតុ (រតនៈ) ទាំងបីនេះជាទីពឹង ។ បើមនុស្សយើងម្នាក់ៗហាត់ពិនិត្យចិត្តខ្លួនឯង ហើយបញ្ចូលនូវធាតុជាកុសល ជាវិជ្ជមាន ធាតុជាមនុស្សធមិបន្តិចម្តងៗទៅក្នុងការរស់នៅប្រចាំថ្ងៃតាមវិធីដូចខ្ញុំជំរាបខាងលើនោះ គុណភាពនៃចិត្ត យើងនឹងបានកាន់តែប្រសើរឡើង មានពន្លឺឡើង ស្ងប់សន្តិភាពឡើង កាន់តែសប្បាយរីករាយឡើង ។

-ការរក្សាសីល៥នេះ អាចនាំមកនូវសេចក្តីសុខចំរើនគ្រប់ប្រការក្នុងជីវិតជាក់ស្តែង ហើយនេះជាឈ្នាន់សំរាប់យើងម្នាក់ៗឈានឡើងទៅដំណាក់កាលសមាធិ ដែលជាជំហានរំដោះចិត្តមនុស្សពីភាពសៅហ្មងសព្វយ៉ាង ដល់ឫសគល់ ឬការសំអាតចិត្តឱ្យបរិសុទ្ធ ។ អ្នកកាន់ព្រះពុទ្ធសាសនាដែលប្រព្រឹត្តត្រឹមតែសីលនោះ អាចទទួលផលពីសាសនាបានតែមួយកិរិតប៉ុណ្ណោះ ពុំទាន់បានពិសោធន៍ឃើញពន្លឺនៃព្រះនិព្វានពិតប្រាកដក្នុងខ្លួននៅឡើយទេ ។

## ខ_ខ្លឹមសារសមាធិវិបស្សនា

ខ្ញុំសូមអធិប្បាយចំណុចនេះដោយចែកចេញជាពីរជំពូក ១-ទ្រឹស្តី និង ២-ការអនុវត្តន៍ជាក់ស្តែង ។

### ១- ទ្រឹស្តីសមាធិវិបស្សនា

១០- គោលការណ៍៤យ៉ាងនៃសមាធិវិបស្សនា :

ដើម្បីប្រតិបត្តិសមាធិវិបស្សនាឱ្យបានសំរេចគោលដៅ គប្បីអ្នកគួរយល់ដឹងគោលការណ៍៤យ៉ាងនោះគឺ :

មួយ- ការទទួលស្គាល់ការមានសតិដឹង (Recognition /Awareness /Knowing)

ពីរ- ការព្រមទទួលយកការសុខចិត្ត (Acceptance)

បី- ការពុំជើរតួ (non-identification )

បួន- ការស្រាវជ្រាវការពិនិត្យយ៉ាងល្អិតល្អន់ (Investigation) ។

●គោលការណ៍ការទទួលស្គាល់ការមានសតិដឹង (Recognition / Awareness/ knowing) :

ក្នុងជីវិតធម្មតាយើងខិតខំពង្រីកការយល់ដឹងអំពីអ្វីៗជុំវិញខ្លួន សំរាប់ជាមូលដ្ឋាននៃការត្រិះរិះពិចារណា និងរកដំណោះស្រាយបញ្ហា ។ បើមានហេតុអ្វីកើតមាន ជាដំបូងយើងតែងស្រាវជ្រាវស្វែងយល់រកមូលហេតុ រួចទើបដោះស្រាយតាមដំណើរ ។

ក្នុងកិច្ចការអង្គុយតាំងសមាធិក៏ធ្វើដូច្នោះដែរ ។ យើងត្រូវមានសតិដឹងរាល់អ្វីៗកំពុងកើតមានក្នុងខ្លួនជាប់ជានិច្ច ។ តើក្នុងខ្លួនមានហេតុភេទអ្វីកំពុងកើតមាន : ញ័រសាច់ ដំណើរបេះដូង ស្ពឹកស្រពន់ ឈឺសន្លាក់ដៃជើង អស់កម្លាំង ហេវហត់ ស្រៀវព្រឺ ក្តៅរងា ស្រួលខ្លួន ។ តើក្នុងផ្ទៃចិត្តមានអ្វីកំពុងលេចឡើង : កំពុងគិតជ្រួលច្របល់ ច្រាស់ច្រាល តប់ប្រមល់អារម្មណ៍ ភ័យព្រួយបារម្ភ ស្រណោះ ច្រណែន ប្រច័ណ្ឌ និន្ទា កើតលោភ តណ្ហា កំហឹង សោកសង្រេង គំនុំ ។ល។

(មានតនៅលេខក្រោយ)

តមកទំព័រទី ០៦

## ខ្មែរនៅឯនាយសមុទ្រនាំគ្នាធ្វើបាតុកម្ម...

ហើយនិយាយម្យ៉ាងទៀតនោះ ជាការផ្សព្វផ្សាយនូវព័ត៌មានក៏អាចថាបានដែរ..."។

ដើម្បីទាមទារឱ្យអង្គការសហប្រជាជាតិ ជួយអន្តរាគមន៍កុំឱ្យប្រទេសសៀម អុកឡុករឿងប្រាសាទព្រះវិហារទៀត ព្រោះប្រាសាទព្រះវិហារជារបស់ខ្មែរសុទ្ធសាធ...។ លោកបានបន្តថា ខ្មែរបានកសាងប្រាសាទព្រះវិហារតាំងពី ៣០០ឆ្នាំមុនសៀម កកើតជាប្រទេសមកម្ល៉េះ ដូច្នេះគ្មាន ហេតុផលណាមួយដែលសៀមទាមទារយកប្រាសាទព្រះវិហារពីខ្មែរឡើយ។ ដោយលិខិតមួយច្បាប់ដែលបង្ហាញនូវការគាំទ្រទាំងស្រុងចំពោះគោលជំហររបស់រដ្ឋាភិបាលកម្ពុជា ស្តីពីករណីវិវាទព្រះវិហារ ក៏ត្រូវបានផ្ញើរទៅកាន់លោក ហោ ណាំហុង ផងដែរ។

**នាទីក្រុងម៉ុងរេអាល់** : ចំណែកសហគមន៍ខ្មែរប្រទេសកាណាដា ឯណោះវិញ ក៏បានរៀបចំនូវមហាបាតុកម្មប្រឆាំងនឹងការឈ្លានពានរបស់សៀម មកលើបូរណៈភាពដែនដីខ្មែរផងដែរ។ បាតុកម្មនេះបានប្រព្រឹត្តឡើងកាលពីថ្ងៃសុក្រ ទី១៨ ខែកុម្ភៈកន្លងមកនេះ នាម៉ោង១១ព្រឹក នៅទល់មុខវិមានរដ្ឋសភា ក្នុងទីក្រុងអូតាវ៉ា ហើយក្បួនបាតុកម្មនឹងបន្តដង្ហែរក្បួនរបស់ខ្លួនទៅទៅកាន់ស្ថានទូតថៃជាបន្ត។

លោក ជា សោភ័ណ្ឌ ជាអ្នកចូលរួមម្នាក់ក្នុងចំណោមបាតុករជាង៨០នាក់ មានទាំងមនុស្សចាស់ប្រុសស្រី ព្រមទាំងយុវជន បានផ្តល់កិច្ចសម្ភាសន៍ដល់ "ខ្មែរប៉ុស្តិ៍" ពីប្រទេសកាណាដា ជុំវិញការធ្វើបាតុកម្មនោះថា : មកដល់ដំណាក់កាលនេះ បងប្អូនខ្មែរនៅទីក្រុងម៉ុងរេអាល់ទាំងមូលពុំបានគិតដល់រឿងនយោបាយអ្នកនេះកាន់បក្សនេះ ឬបក្សនោះអ្វីឡើយតែរឿងដែលខ្មែរយើងត្រូវគិត គឺរួបរួមកម្លាំងគ្នាដើម្បីតតាំងជាមួយសត្រូវរបស់ជាតិយើង គឺសៀមនេះតែម្តង។

លោក សោភ័ណ្ឌ បានបន្តថា : ពួកយើងបានដាក់ជាញត្តិ ដែលមានទាំងភាសាបារាំង និងភាសាអង់គ្លេស ដែលអត្ថន័យស្តីបន្ទោសដល់រដ្ឋាភិបាលនៃប្រទេសសៀម ថាចុះហេតុអ្វីសៀមហ្នឹងមិនយល់អំពីព្រឹត្តិការណ៍ដែលខ្មែរឈ្នះក្តីលើវិវាទប្រាសាទព្រះវិហារនាថ្ងៃទី១៥ កក្កដា ឆ្នាំ១៩៦២ នៅឯតុលាការអន្តរជាតិនាទីក្រុងឡាអេ ប្រទេសហូឡង់? ។ នៅពេលប្រទេសបារាំងអនុម័តធ្វើអន្តរាគមន៍លើផ្ទៃដីមានជម្លោះនៅឆ្នាំ១៩០៤ និងនៅឆ្នាំ ១៩០៧ ប្រទេសសៀមនេះ ក៏បានដឹងឮ ហើយក៏បានចុះហត្ថលេខាលើបញ្ហានេះទៀត ចុះហេតុអ្វីបានជាសៀមនៅតែតឃ្លើនចង់បានដីខ្មែរទៀត។ ចំណែកឯសន្និសីទនាទីក្រុងប៉ារីស គឺជាចំណុចសំខាន់ជាងគេដែលគ្របដណ្តប់លើបញ្ហាទាំងហ្នឹង ។

ក្រៅពីការស្តីបន្ទោសដល់ការឈ្លានពានរបស់សៀម លោក សោភ័ណ្ឌ ក៏បានបង្ហាញនូវអារម្មណ៍មិនពេញចិត្តចំពោះរដ្ឋាភិបាលកម្ពុជាផងដែរ ក្នុងការព្រងើយកន្តើយពុំព្រមប្តឹងទៅតុលាការអង្គការសហប្រជាជាតិ ជុំវិញជម្លោះដ៏រាំរ៉ៃនេះ ដោយលោកថ្លែងបន្តថា: រដ្ឋាភិបាលខ្មែរគួរតែប្តឹងដល់អង្គការសហប្រជាជាតិ ព្រោះរឿងនេះពុំមែនទើបតែកើតឡើងឡើយ ផ្ទុយទៅវិញ រដ្ឋាភិបាលខ្មែរបានត្រឹមតែផ្តល់ដំណឹងដល់អង្គការសហប្រជាជាតិតែប៉ុណ្ណោះ៕

ទស្សន៍ទាយជោគជតារាសី

# ជោគជតារាសីលោកអ្នកថ្ងៃទី ២៥កុម្ភៈ-១០មីនា ឆ្នាំ២០១១



**ឆ្នាំជូត : (ពង្សទេវ្តាប្រុស ធាតុទឹក)**

រាសីលោកអ្នកល្អជាមធ្យម។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ គឺអាចទទួលបានផលសម្រេចត្រឹមតែពាក់កណ្តាលប៉ុណ្ណោះ ដូច្នេះលោកអ្នកមិនត្រូវហ៊ានប្រថុយប្រថានបណ្តាក់ទុនរកស៊ីដោយទ្រង់ទ្រាយធំឡើយ ។ ចំពោះគូស្នេហ៍មានភាពស្និទ្ធស្នាលដូចសព្វមួយដង ៕

**ឆ្នាំឆ្លូវ : ( ពង្សមនុស្សប្រុស ធាតុដី )**

រាសីលោកអ្នកល្អមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ។ ក្នុងរយៈពេលនេះថ្វីត្បិតតែការងាររកស៊ីអាចរើប ៗបន្តិចឡើងវិញក្តី តែអ្វីដែលលោកអ្នកគួរប្រយ័ត្នប្រយែងនោះ គឺនឹងមានមនុស្សសម្តីផ្អែមបង់បោកប្រាស់តាមគ្រប់រូបភាព ដូច្នេះទាំងបុរសស្ត្រី គឺមិនត្រូវឆាប់ត្រចៀកទន់ជឿទុកចិត្តគេពេកទេ។ គូស្នេហ៍ក្នុងរយៈពេលនេះប្រកបតែសេចក្តីសុខនឹងគ្នា ៕

**ឆ្នាំខាល : ( ពង្សយក្សស្រី ធាតុឈើ )**

រាសីលោកអ្នកល្អជាមធ្យម។ រាល់កិច្ចការងាររកស៊ីជួញដូរកាក់កបល្អគ្រាន់បើ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូរកុំធ្វេសប្រហែសឲ្យសោះ ដាពិសេសចំពោះអាជីវករអ្នករកស៊ីលក់ដូរមុននឹងប្រគល់ ឬទទួលនូវមុខទំនិញសព្វសាររពើ ចូរបេះពិនិត្យមើលគុណភាព និងរាប់ចំនួនឲ្យបានត្រឹមត្រូវ។ ចំពោះគូស្វាមីភរិយា ចូរប្រយ័ត្នអ្នកក្រៅមកញុះញង់ ៕

**ឆ្នាំថោះ : ( ពង្សមនុស្សស្រី ធាតុឈើ )**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ បើមានរឿងឈ្លោះវិវាទកើតឡើង ចូរបេះអត់ធ្មត់ និងរម្ងាប់ចិត្តឲ្យបានត្រជាក់។ ចំពោះស្ត្រីភេទក្នុងរយៈពេលនេះមិនត្រូវនិយាយស្តីប៉ប៉ាច់ប៉ប៉ោចឥតបានការច្រើនពេកទេ ព្រោះរឿងរ៉ាវផ្សេងៗអាចកើតចេញពីពាក្យសម្តី ។ ចំពោះគូស្វាមីភរិយាចូរប្រយ័ត្នប្រយែងក្រែងមានអ្នកទីបីចូលជ្រៀតជ្រែក ៕

**ឆ្នាំរោង : (ពង្សទេវ្តាប្រុស ធាតុមាស)**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹម ៗ។ ក្នុងរយៈពេលនេះដោយទំនាយទាយថា អាចបង់ខាតទ្រព្យខ្លះៗនោះ ដូច្នេះចូរកុំឲ្យគេខ្ចីរបស់របរមានតម្លៃឲ្យសោះ ព្រោះកាលបើបានធ្លាក់ដល់ដៃគេហើយ គឺគ្មានថ្ងៃបានវិលត្រឡប់វិញឡើយ ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះមានផលប៉ះទង្គិចគ្នាបន្តិចបន្តួច ៕

**ឆ្នាំម្សាញ់ : (ពង្សមនុស្សប្រុស ធាតុភ្លើង)**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងរឿងរកាំរកូសច្រើន។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូររៀបចំគម្រោងផែនការជាមុនទើបពុំមានការថ្លោះធ្លោយ។ ក្រៅពីនោះបើមានរឿងឈ្លោះវិវាទកើតឡើង ចូរបេះអត់ធ្មត់ និងរម្ងាប់ចិត្តឲ្យបានត្រជាក់ទើបរឿងតូចមិនអាចក្លាយជារឿងធំបាន។ គូស្នេហ៍ក្នុងរយៈពេលនេះច្រើនពាក់មុខយក្សដាក់គ្នា៕

**ឆ្នាំមមី : (ពង្សទេវ្តាស្រី ធាតុភ្លើង)**

រាសីលោកអ្នកល្អជាមធ្យម។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះអ្វីៗច្រើនមានការប្រែប្រួលពុំទៀងទាត់ឡើយ ដូច្នេះបើលោកអ្នកមានលក់ដីធ្លីផ្ទះសម្បែង ឬវត្ថុមានតម្លៃផ្សេងៗ ចូរធ្វើលិខិតស្នាមជាលាយលក្ខណ៍អក្សរដោយមានចុះហត្ថលេខា ឬផ្តិតស្នាមមេដៃឲ្យបានត្រឹមត្រូវទើបទៅថ្ងៃមុខពុំមានបញ្ហាចោទឡើង ។ ចំពោះគូស្នេហ៍មានភាពស្និទ្ធស្នាលដូចប្រក្រតី៕

**ឆ្នាំមមែ : (ពង្សទេវ្តាស្រី ធាតុមាស)**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះអ្វីៗច្រើនមានការប្រែប្រួលពុំទៀងទាត់ឡើយ។ ដូច្នេះបើលោកអ្នកមានទិញលក់ដីធ្លីផ្ទះ ឬវត្ថុមានតម្លៃផ្សេងៗ ចូរធ្វើលិខិតស្នាមដោយមានចុះហត្ថលេខា ឬផ្តិតស្នាមមេដៃឲ្យបានត្រឹមត្រូវទើបទៅថ្ងៃមុខពុំមានបញ្ហាចោទឡើង ។ គូស្នេហ៍ប្រកបតែសេចក្តីសុខក្សេមក្សាន្ត ៕

**ឆ្នាំវក : (ពង្សយក្សប្រុស ធាតុដែក)**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់។ ក្នុងរយៈពេលនេះទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ គឺរមែងតែងតែបានទទួលផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់។ ក្នុងរយៈពេលនេះបុរសត្រូវប្រយ័ត្នចំពោះមនុស្សស្រីដែលមានសម្តីផ្អែមអាចរលាយទ្រព្យឆាប់។ គូស្នេហ៍ប្រកបតែសេចក្តីសុខក្សេមក្សាន្ត ៕

**ឆ្នាំរកា : (ពង្សយក្សប្រុស ធាតុដែក)**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់។ ក្នុងរយៈពេលនេះលោកអ្នកមានអារម្មណ៍ភ្លឺថ្លាគំនិតប្រាជ្ញាឈ្លាសវៃ ទោះបានប្រកបកិច្ចការងារអ្វីៗក៏ដោយក៏អាចទទួលបានផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់ តែចូរកុំមានចិត្តលោភលន់ឲ្យសោះ ព្រោះការលោភលន់នាំមកនូវក្តីវិនាសអន្តរាយ។ គូស្នេហ៍មានភាពល្អូកល្អិនយល់ចិត្តគ្នាល្អណាស់៕

**ឆ្នាំច : ( ពង្សយក្សស្រី ធាតុដី )**

រាសីលោកអ្នកល្អជាមធ្យម។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែមានភោគផលចំណូលហូរចូលច្រើនគួរសមក្តី តែពុំមានសល់អ្វីជាដុំកំភួនឡើយ ព្រោះចាយវាយខ្ជះខ្ជាយខ្លាំងពេក ហើយក៏មិនខុសពីទូកធំក្តោងធំនោះដែរ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះទាល់តែបេះអត់ឱនឲ្យគ្នាទៅវិញទៅមកទើបមិនអាចប្រេះឆាគ្នាបាន ៕

**ឆ្នាំកុរ : (ពង្សមនុស្សស្រី ធាតុទឹក)**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែការងាររកស៊ីរបស់លោកអ្នកបានជួបនឹងគូប្រជែងដើងខ្លាំងយ៉ាងណាក្តីក៏មិនភ័យព្រួយអ្វីដែរ ព្រោះលោកអ្នកមានប្រៀបឈ្នះជាប់ជានិច្ច។ ចំពោះកំលោះក្រមុំក្នុងរយៈពេលនេះអាចទាក់ទងគ្នានឹងបានក្លាយជាគូស្នេហ៍ដ៏ប្រពៃមួយគូ ៕




# ថែបំប៉នរោមភ្នែក

●សំរាប់សុភាពនារីដែលយកចិត្តទុកដាក់លើការតុបតែងសម្រស់ផ្ទៃមុខប្រហែលជាគេចមិនផុតពីរឿងរោមភ្នែកនោះឡើយ។ តើសុភាពនារីទាំងឡាយអ្នកដឹងដែរឬទេថា ការប៉ះពាល់ទៅលើរោមភ្នែកញឹកញាប់ពេកនោះ វាគឺជាសកម្មភាពមួយបំផ្លាញដល់សុខភាពរោមភ្នែកបានដោយមិនដឹងខ្លួន ។ នោះ ក៏ព្រោះថា នៅក្នុងម៉ាស្ការ៉ា ដែលប្រើវាសទៅលើរោមភ្នែកនោះ មានលាយឡំទៅដោយសារជាតិគីមីជាច្រើនប្រភេទបំផុត មានទាំងពណ៌ សារធាតុបង្កើនកំហាប់ សារធាតុជួយ ញែកបំបែកជាតិប្រេងចេញពីទឹក រួមទាំងសារជាតិការពារផ្សិមទៀតផង ។

បន្ទាប់ពីអ្នកបានជ្រាបបែបនេះហើយគួរស្វែងរកពេលវេលាសំរាប់ថែបំប៉នរោមភ្នែក ព្រោះថា ការថែបំប៉នរោមភ្នែកនោះគ្មានអ្វីដែលធ្វើឲ្យលំបាកហួសពីសមត្ថភាពដែលអាចធ្វើទៅបាននោះដែរ។ ក្នុងនោះយើងគ្រាន់តែណែនាំឲ្យអ្នកងាកមកយកចិត្តទុកដាក់ចាប់តាំងពីការសំអាត បន្ទាប់ពីអ្នកបានប្រើម៉ាស្ការ៉ាអស់ពេញមួយថ្ងៃហើយនោះ គួរតែមានការលាងសំអាតរោមភ្នែកចេញ ។

ចំពោះវិធីលាងសំអាតអ្នកអាចប្រើបេប៊ីអយជ្រលក់នឹងសំឡី រួចជូតស្រាលៗទៅលើរោមភ្នែកធ្វើយ៉ាងណាកុំឲ្យនៅសេសសល់កំទេចម៉ាស្ការ៉ាជាប់នៅទីនោះ ព្រោះពេលខ្លះវាអាចបង្កជាអាការលោកបាន។ រីឯការថែបំប៉នរោមភ្នែកវិញសូមណែនាំឲ្យធ្វើក្នុងមួយសប្តាហ៍ម្តង ដោយការលាបវ៉ាសលីន ឬប្រើបេប៊ីអយស្តើងៗទុកចោលមួយរយៈ បន្ទាប់មកប្រើទឹកស្អាតលាងចេញនោះ នឹងធ្វើឲ្យរោមភ្នែកឡើងខ្មៅរលើបរលោង ហើយថែមទាំងមានសុខភាពរឹងមាំល្អទៀតផង ។

ក្រៅពីនេះក៏គួរព្យាយាមទទួលទានអាហារណាដែលសំបូរទៅដោយអាស៊ីដហ្វូលិក និងស័ង្កសី ដូចជាថ្លើម បន្លែពណ៌បៃតង ទឹកដោះគោជូរ និងខ្យងសមុទ្រ ដោយអាហារអស់ទាំងនេះវាជួយបំប៉នរោមភ្នែកឲ្យស្រស់ស្អាត និងមិនងាយជ្រុះទៀតផង ៕

# វិធីផ្តល់សំណើមដល់ស្បែក

**ខាងក្រោមនេះគឺជាវិធីដែលជួយផ្តល់សំណើមដល់ស្បែកធ្វើឱ្យស្បែករបស់អ្នកមានជាតិទឹករលើបរលោងប្រៀបដូចជាមនុស្សមានសុខភាពល្អយ៉ាងដូច្នោះដែរ។ ទោះបីយ៉ាងណាៗ ក៏សូមផ្តាំទុកមុនថារឿងបែបនេះសុភាពស្ត្រីមិនគួរផ្ទាតទាល់តែសោះ ។**

● គួរទទួលទានទឹកយ៉ាងហោចណាស់ក្នុងមួយថ្ងៃ៨កែវ ឬក៏ច្រើនជាងនេះ ព្រោះវាជួយឲ្យរាងកាយជួយបណ្តេញជាតិពុលធ្វើឲ្យស្បែកខ្លួន និងស្បែកមុខបានស្រស់ថ្លា ។

● សាកល្បងមកប្រើទឹកផ្កាកុលាបឲ្យត្រជាក់ទុកសំរាប់លុបលាងមុខព្រឹក និងល្ងាចលមើល ព្រោះវាជួយកាត់បន្ថយស្នាមជ្រីវជ្រួញនៅលើស្បែកមុខ ហើយថែមទាំងជួយសំរួលសភាពស្បែក ព្រមទាំងស្តារឡើងវិញនៅតុល្យភាពដល់ស្បែកបានយ៉ាងល្អទៀតផង។

● ក្រៅពីរាងកាយត្រូវការជាតិទឹកហើយនោះស្បែករបស់អ្នកក៏ត្រូវការជាតិទឹកដូចគ្នាដែលអ្នកអាចធ្វើបានដោយការបាញ់ស្ព្រៃទឹករ៉ែនៅលើផ្ទៃមុខ ដើម្បីឲ្យផ្ទៃមុខរក្សាទុកនូវភាពសំណើមនោះឯង ។




● ស្វែងរកពេលវេលាទំនេរតាមរូបមន្តណែនាំខាងលើនេះ រួចយកទឹកឃ្មុំក្តៅឧណ្ហៗមកលាបនៅលើផ្ទៃមុខ និងកទុកចោលពី១៥-២០នាទី រួចហើយលាងចេញទុកជារក្សាស្បែកមុខ និងជួយបង្កើនភាពសំណើមដល់ផ្ទៃមុខទៀតផង ។

● ប្រយោជន៍របស់ទឹកឃ្មុំនៅមិនទាន់អស់ត្រឹមនេះនោះទេ ព្រោះអ្នកអាចយកទឹកឃ្មុំទៅលាយជាមួយទឹកដោះគោឆៅ ហើយងូតទឹកឲ្យសព្វរាងកាយ។ បន្ទាប់មកទើបលាបក្រែមបំប៉នតាមក្រោយ អាចធ្វើឲ្យស្បែកអ្នកឡើងស្រទន់គួរឲ្យចង់ស្ទាបអង្អែលបំផុត ។

● ឬក៏អាចប្រើរូបមន្តមួយទៀត គឺយកគ្រាប់សណ្តែកអាល់ម៉ុនលាយជាមួយទឹកដោះគោជូរលាបបំពកនៅលើផ្ទៃមុខទុកចោលរយៈពេលពី១៥-២០នាទី។ ក្រោយពេលរួចរាល់ហើយលាងចេញឲ្យស្អាតជូតមុខឲ្យស្ងួតរួចឆ្លុះកញ្ចក់មើលស្បែកថ្មីរបស់អ្នកនោះ អ្នកនឹងឃើញថា ស្បែកអ្នកឡើង.សហើយទន់ ទោះបីជាទើបនឹងធ្វើលើកដំបូងក៏ដោយចុះ ។

**ស្បែក :** ● ស្បែកស្តើង ក្រោយពេលងូតទឹក និងមុនពេលចាកចេញពីផ្ទះរាល់លើកគួរលាបស្បែកអ្នកដោយប្រេងអាល់ម៉ុន ឬប្រេងដូង ដើម្បីជួយការពារស្បែកពីកំដៅព្រះអាទិត្យ និងខ្យល់ ។

● ស្បែកងាយរលាកក្រហាយ គួរជ្រើសរើសក្រែមឬម៉យជីវ័រសីប្រភេទដែលពុំមានចំណែកផ្សំពីអាស៊ីត ឬទឹកអប់ ព្រោះជាអ្នកឆាប់ធ្វើឲ្យស្បែកងាយប្រតិកម្ម ។ ដូច្នេះមុនពេលជ្រើសរើសទិញផលិតផល គួរអានទិន្នន័យនៅលើស្លាកផលិតផលឲ្យបានច្បាស់មុនពេលសំរេចចិត្តទិញមកប្រើ ។

● ស្បែកធម្មតា ណែនាំឲ្យប្រើឡូឆាន់ដែលជួយផ្តល់សំណើមដល់ស្បែក។ ប្រសិនបើចំលើរដូវរងាទៀតនោះ ស្បែកកាន់តែឆាប់ក្រៀមស្ងួតព្រមទាំងអាចធ្វើឲ្យស្បែករមាស់ ឬបែកស្រកាបានទៀតផង ។ ដូច្នេះគួររកឡូឆាន់ប្រភេទដែល ជួយរក្សាភាពសំណើមបាន២៤ម៉ោងមកលាបការពារទុកទើបប្រសើរ ។

● ស្បែក.សថ្លា យើងណែនាំឲ្យយកអំពិលទុំមកខាត់ស្បែក ប្រសិនបើជាប្រភេទអំពិលដែលសំបូរទៅដោយកាកសរសៃមកខាត់កាន់តែប្រសើរ ព្រោះវាជួយខាត់ជិរះវត្ថុស្មោគគ្រោតចេញអស់។ ក៏ប៉ុន្តែអាចមានផលពិបាកដូចជា ឈឺ ឬក៏ផ្សាបន្តិចបន្តួចពេលកំពុងដុសខាត់តែផលដែលទទួលបានវាសមនឹងការចំណាយ ព្រោះវាជួយឲ្យស្បែកទន់រលោងគួរឲ្យចង់អង្អែលកាន់តែខ្លាំងឡើង ៕

តមកទំព័រទី ០១

## ប្រធានាធិបតីពីររូបរាសនាអាក្រក់...

ដែលខ្លួនដាក់លក់តាមដងផ្លូវដោយគ្មានច្បាប់។ យុវជនជាច្រើននៅក្នុងស្ថានភាពដូចគ្នានេះ ដែលចេញពីសាលារកការងារធ្វើគ្មានខិតខំរស់ដោយត្រដរតាមតែខ្លួនធ្វើទៅបាន ដោយសាររដ្ឋអំណាចប្រកាន់បក្សពួកពុករលួយ និងផ្តាច់ការនិយម។ មុននឹងដុតខ្លួន ប៊ូស៊ីស៊ី បានប្រកាសយ៉ាងជំហរនូវប្រយោគចោទប្រកាន់រដ្ឋបាលទុយនេស៊ី និងប្រធានាធិបតី បិនអាលី យ៉ាងចាស់ដៃ ហើយប្រយោគទាំងនោះ បានបំពងសម្លេងយ៉ាងខ្ទរខ្ទារតាមប្រព័ន្ធអ៊ីនធើណេត បញ្ចេញបានជាចលនា បាតុកម្មនៃក្រុមយុវជន ដែលចេះតែរីកធំឡើងយ៉ាងឆាប់រហ័ស បូករួមទាំងការកាន់កាប់អំណាចយូរ២៣ឆ្នាំរបស់ បិនអាលី ក្រុមបក្សប្រឆាំងក្រុមបងប្អូនមូស្លីម ដែលទទួលការបង្ក្រាប និងទទួលបានសន្យានូវការក្បត់សន្យាយូរឆ្នាំ ក៏ចូលរួមផ្តល់កម្លាំងឱ្យក្រុមយុវជនទាមទារឱ្យ បិនអាលី ចុះចេញ។ តែបាតុកម្មដ៏សំខាន់នៅក្រុងទូនីស លើកនេះបានត្រូវកងទ័ពប្រកែកមិនប្រើកម្លាំងលើបាតុករ បង្ករឱ្យសម្លេងប្រឆាំងរីករាលដាលទូទាំងប្រទេស។ លោកប្រធានាធិបតី បិនអាលី បានសាកល្បងពង្រឹងជំហរអំណាចប៉ូលិសសន្តិសុខថ្ងៃទី៧ ខែមករា ឆ្នាំ២០១១ ដោយទប់ស្កាត់ចលនាបាតុករ ហើយសន្យាថា ឱ្យមានការបោះឆ្នោតនៅ៦ខែខាងមុខ ដែលជាហេតុធ្វើឱ្យបាតុកម្មរីតតែឆេះឆួលខ្លាំងឡើង រហូតដល់មានការចូលលុករបស់ក្រុមបាតុករក្នុងគ្រួសារមហាផ្ទៃទៀត។ ថ្ងៃទី១៤ ខែមករា នាយករដ្ឋមន្ត្រី មហាមេត ក្រានូឈី បានប្រកាសថា "ខ្លួនទទួលអំណាចជាប្រធានាធិបតីបណ្តោះអាសន្ន" ក៏ប៉ុន្តែតុលាការធម្មនុញ្ញ បានប្រកាសផ្ទុយគ្នាថា "តំណែងប្រធានាធិបតីពេលនេះនៅទំនេរ" ដោយតែងតាំងនាយករដ្ឋមន្ត្រីខុសនឹងរដ្ឋធម្មនុញ្ញ។រសៀលថ្ងៃសៅរ៍ ទី១៥ ខែមករា ប្រធានរដ្ឋសភា ហ្វូអាដ មីបាស៊ី បានឡើងធ្វើសច្ចាប្រណិធាននៅមុខសភាព្រះអង្គកាន់តំណែងជាប្រធានាធិបតីជំនួស រហូតដល់ពេលបោះឆ្នោតរើសប្រធានាធិបតីថ្មីនៅចន្លោះ ៤៥ថ្ងៃ និង៦០ថ្ងៃខាងមុខ។

រីឯលោក បិនអាលីបានគេចខ្លួនលើយន្តហោះកន្ទុយ៤គ្រឿងជាមួយក្រុមគ្រួសារទៅសុំជ្រកកោននៅប្រទេសបារាំង (មិនទទួល) រួចមកក៏ទៅអារ៉ាប៊ីសេអូឌីត ប្រទេសនោះទទួលឱ្យស្នាក់អាស្រ័យបាន។

ថ្ងៃទី២៦ ខែមករា រដ្ឋាភិបាលទុយនេស៊ី បានចេញដីការអន្តរជាតិរកចាប់ខ្លួនអតីតប្រធានាធិបតី បិនអាលី ពីបទយករូបិយប័ណ្ណចេញពីប្រទេសខុសច្បាប់។ ទិញដី និងផ្ទះនៅក្រៅប្រទេសខុសច្បាប់ ហើយធានាគារស្វីសបានត្រូវបង្គាប់ឱ្យឃាត់ការចេញប្រាក់រាប់លានដុល្លាររបស់ បិនអាលី និងគ្រួសារមិនឱ្យប្រើបាន។

**២- ប្រទេសអេហ្ស៊ីប :**

មានបាតុកម្មមួយបានផ្ទុះឡើងនៅតំបន់ខាងជើងនៃក្រុងស៊ុយអេ នាថ្ងៃទី២៤ ខែមករា ឆ្នាំ២០១១ ដោយមានចំហាយនៃចលនាប្រជាពលរដ្ឋទុយនេស៊ី ដើម្បី


ទិដ្ឋភាពការធ្វើបដិវត្តន៍នៅប្រទេសទុយនេស៊ី និងប្រទេសអេហ្ស៊ីប

ទម្លាក់ប្រធានាធិបតីរបស់គេ។ ចលនាបាតុកម្មនេះបានត្រូវទប់ស្កាត់យ៉ាងតឹងតែងពីសំណាក់ក្រុមប៉ូលិស ដោយមានការបាញ់គ្រាប់កៅស៊ូ និងគប់ដំថ្មតបតវិញ បណ្តាលឱ្យស្លាប់មនុស្សបីនាក់ និងរបួស៤៩នាក់ខាងបាតករ ចំណែកឯខាងប៉ូលិសមានរបួស៣៦នាក់។ ការស្លាប់បាតុករនេះបានជំរុញឱ្យប្រជាពលរដ្ឋនៅទីក្រុងគែរ ឬខាយរ៉ូ ខឹងសម្បារនឹងរដ្ឋបាលរបស់ខ្លួនចេញធ្វើបាតុកម្មគគ្រឹកគគ្រេងគួរឱ្យភ្ញាក់ផ្អើល។

នាថ្ងៃអង្គារ និងថ្ងៃពុធ នៅ "ទីលានរំដោះ" (ត្រាវៀស្ត័រ)។ នៅទីនោះជាម្តងថ្មីម្តងទៀត ប៉ូលិសបានចេញមកទប់ស្កាត់កុំឱ្យបាតុករសំដៅទៅអគារសភាជាតិ បានការបាញ់គ្រាប់បែកផ្សែង និងគ្រាប់កៅស៊ូតបតនឹងក្រុមបាតករដែលគប់ដំថ្ម។ លើកនេះបាតុករបានទាក់ទាញអារម្មណ៍ពលរដ្ឋដែលនៅស្ងៀមស្ងាត់នៅឡើយ បានយ៉ាងច្រើនទៀតនៅក្នុងតំបន់នេះក៏ចំហាយនៃជោគជ័យរបស់ពលរដ្ឋទុយនេស៊ីកាលពី១០ថ្ងៃមុននេះសោះអាចទម្លាក់ប្រធានាធិបតី បិនអាលី ដែលកាន់អំណាច២៣ឆ្នាំហើយនោះបាន។ ប្រជាប្រិយភាពនេះបានធ្វើឱ្យរដ្ឋបាលលោក អូស្នី មូបារ៉ាក់ បិទទូរស័ព្ទ បិទអ៊ីនធើណេត មិនឱ្យមានការទាក់ទងគ្នាបាន ហើយលោក មូបារ៉ាក់ ក៏មិនមានឆន្ទៈនឹងបញ្ចប់តួនាទីលោកទេ។ សហរដ្ឋអាមេរិកមានលោកស្រីរដ្ឋលេខាធិការក្រសួងការបរទេសបានគាំទ្រគំនិតឱ្យមានការបង្ហាញឆន្ទៈដោយសេរីតាមទីសាធារណៈ ដោយសន្តិវិធី ហើយទាមទារឱ្យបើកបណ្តាញទាក់ទងមកវិញ។

ថ្ងៃទី២៨ ខែមករា មេបក្សប្រឆាំង មូហាមេត អែល បារ៉ាដាយ ដែលជាជ័យលាភីណូបែល បានចូលរួមក្នុងបាតុកម្មខាងក្រុមបងប្អូនមូស្លីម ក៏ចេញមុខគាំទ្រដើម្បីជួយបញ្ចប់រជ្ជកាលរបស់ មូបារ៉ាក់ បន្ថែមពីនេះទៀត ប្រធានាធិបតីនៃសហរដ្ឋអាមេរិក បារ៉ាក់ អូបាម៉ា បានរំលឹកពីប្រទេសអេហ្ស៊ីបជាដៃគូររបស់សហរដ្ឋអាមេរិក ហើយទាមទារមិនឱ្យយោធាប្រើអាវុធប្រឆាំងពលរដ្ឋអេហ្ស៊ីប។ រីឯយោធាដែលបាន


ប្រធានាធិបតី អូស្នី មូបារ៉ាក់

លេចចេញមកដ៏គួរឱ្យភ័យបែរជាពុំមានសកម្មភាពដូចការបារម្ភរបស់ពលរដ្ឋទៅវិញ ហើយប្រកាសថា "នឹងមិនប្រើកម្លាំងទ័ពទៅលើពលរដ្ឋខ្លួនឯងនោះទេ"។ នេះជាប្រជាប្រិយភាពនៃចលនាប្រជាពលរដ្ឋដែលពុំមានការលូកដៃពីបក្សប្រឆាំង ពីចលនាមូស្លីមអ្វីទាំងអស់ ហើយប្រជាប្រិយភាពនេះ បានរីកទៅដល់ប្រទេសផ្តាច់ការឯទៀតៗដូចជា ស៊ូដង់ ឬអ៊ីរ៉ង់ ឬម៉ារ៉ុក ឬស៊ីរី ដែលមេដឹកនាំផ្តាច់ការនិយមធ្វើឱ្យប្រទេសក្រ រាស្ត្រហេមរហាម ប្រទេសចុះខ្សោយទៅហើយដែរ រថគ្រោះលែងធ្វើឱ្យបាតុករខ្លាច។ មូបារ៉ាក់ បានស្នើឱ្យប្រជាជាតិរង់ចាំការបោះឆ្នោតនាខែកញ្ញាខាងមុខដែលខ្លួននឹងថយចេញ តែអ្វីៗបានហួសពេលទោះជាឬរដ្ឋាភិបាលចរចាជាមួយគណបក្សប្រឆាំង ឬក៏ផ្ទេរតំណែងទៅនរណាផ្សេងមួយដោយខ្លួនឯង។ ប្រជាជាតិរាប់លាននាក់នៅទីលានរំដោះ" បានទាមទារឱ្យ មូបារ៉ាក់ ចុះចេញភ្លាម ទោះជាអនុប្រធានាធិបតីដែលទើបនឹងតែងតាំងកាលពី២អាទិត្យមុនក៏ពុំអាចជំនួសបានដែរ។

ក្រុមប្រឹក្សាយោធាដែលចេញមុនច្រើនដងការពារប្រជាបាតុករបានឡើងកាន់អំណាចនៅពេលដែល អូស្នី មូបារ៉ាក់ ទាល់ច្រក ហើយចាកចេញពីវិមានប្រធានាធិបតី នាថ្ងៃ១៤កុម្ភៈ ។ បន្តពីនោះយោធាបានផ្សព្វផ្សាយគម្រោង៦ខែសម្រាប់គ្រប់គ្រង អេហ្ស៊ីប រហូតឱ្យមានប្រធានាធិបតីថ្មី។ គេនៅពុំទាន់ដឹងថា យោធានឹងមានគម្រោង អូសយកសម្បត្តិដែល មូបារ៉ាក់ នឹងដឹកគ្នាឱយាន បានរាយការណ៍ថា សម្បត្តិ អូស្នី មូបារ៉ាក់ មានដល់ទៅ៧០ពាន់កោដិដុល្លារធ្វើឱ្យបុរសប្តីប្រពន្ធ មូបារ៉ាក់នឹងភរិយាជាមនុស្សមានសម្បត្តិច្រើនជាងគេបង្អស់ក្នុងលោក។ -ខ្មែរប៉ុស្តិ៍-

# ស្ត្រីខ្មែរដំបូងបង្អស់ដែលបានធ្វើដំណើរពីប្រទេសបារាំងមកភ្នំពេញតាមផ្លូវគោក



(តពីលេខមុន)

ដោយ : ពិន នារីពិទូ

● ភ្នាក់ងារទាំងនោះ បានត្រួតពិនិត្យលិខិតស្នាម យ៉ាងយូរ ទើបលោកនាយកបានកត់ត្រានៅខាងក្រោយបណ្ណ័ចំលងនូវលេខតួ លេខម៉ាស៊ីន និងលេខឡានបានបោះត្រា និងចុះហត្ថលេខារួចរាល់ ប៉ុន្តែត្រូវអាក់ខានក្នុងការថតចំលងឯកសារទុកបានដោយសារដាច់ចរន្តអគ្គិសនី ខាងអាជ្ញាធរកម្ពុជាក៏បានអនុញ្ញាតឱ្យពួកគាត់ឆ្លងដែនដោយគ្មានបញ្ហា និងជូនពរឱ្យមានសុវត្ថិភាពតាមផ្លូវ ។ ពេលនោះពួកគាត់បានកំពុងបើកបរយ៉ាងរីករាយនៅលើផ្លូវនៃទឹកដីកំណើតយ៉ាងជោគជ័យ ។



អ្នកធ្វើដំណើរផ្សងព្រេងទាំងពីរ (អ្នកអង្គម្ចាស់ ស៊ីលវីយ៉ា និង អូរេលី) បានចាកចេញពីប្រទេសបារាំង ជាមួយនឹងរថយន្តតូយ៉ូតារបស់ខ្លួននៅថ្ងៃទី០៣ ខែសីហា ឆ្នាំ២០០៦ មកដល់ប្រទេសកម្ពុជា នៅថ្ងៃទី១២ ខែវិច្ឆិកា ឆ្នាំ២០០៦ សរុបអស់រយៈពេលបីខែកន្លះ ។ អ្នកអង្គម្ចាស់ ស៊ីលវីយ៉ា គឺជាស្ត្រីខ្មែរមួយរូបបានរួមដំណើរជាមួយ អ្នកនាងអូរេលី ដែលស្ត្រីជនជាតិបារាំង បានបង្ហាញពីភាពក្លាហាន និងបទពិសោធន៍ក្នុងដំណើរផ្សងព្រេងនៅតាមផ្លូវគោកឆ្លងកាត់ទ្វីបអឺរ៉ុបមកដល់ប្រទេសកម្ពុជាដោយសុវត្ថិភាព អ្នកអង្គម្ចាស់ បានបង្ហាញពីគំរោងមុនចេញដំណើរតាមរយៈផែនទីពិភពលោក និងត្រៀមឧបករណ៍សំរាប់យានយន្តឱ្យបានគ្រប់គ្រាន់ទាំងនេះសបញ្ជាក់ឱ្យឃើញថា គ្មានការជោគជ័យណាមួយអាចប្រព្រឹត្តទៅបានដោយគ្មានគោលដៅច្បាស់លាស់ និងការគ្រោងទុកនោះឡើយ ចំណែកឯការជោគជ័យមួយទៀត គឺបានដោយសារការលើកទឹកចិត្តពីសំណាក់ក្រុមគ្រួសារក៏ដូចជាមិត្តភ័ក្រ្តល្អៗជាច្រើនដែលបានជួយឧបត្ថម្ភពួកគាត់ទាំងពីរទាំងផ្នែកថវិកាក៏ដូចជាផ្នែកសំភារៈរួមទាំងគំនិតយោបល់ផងដែរ ។ គាត់បានរៀបរាប់នូវមនោសញ្ចេតនាទីករលឹកដល់ក្រុមគ្រួសារ និងមិត្តភ័ក្រ




លះបង់នូវភាពភ័យខ្លាចដែលអាចកើតឡើងជាយថាហេតុក្នុងការធ្វើដំណើរផ្សងព្រេងលើពិភពលោកដើម្បីផ្លាស់ប្តូរអារម្មណ៍ឱ្យជ្រះថ្លាស្វែងរកចំណីចក្ខុ និងគំនិតថ្មីស្រឡាង ប្រកបដោយស្នាមញញឹម ។ កូនសោរនោះគឺរបកគំហើញពីធម្មជាតិ សិល្បៈនៃស្ថាបត្យកម្មនៅតាមទីក្រុងធំៗ ការធ្វើពាណិជ្ជកម្មដ៏មមាញឹកទេសភាពនៅតាមជនបទ និងជីវភាពរស់នៅរបស់ប្រជាជនតាមទំនៀមទំលាប់ និងប្រពៃណីនៃប្រទេសនីមួយៗ ជូរភ្នំខ្សៀវស្រងាត់វាលខ្សាច់នៅប្រទេសម៉ុងហ្គោលី ក្រាលដណ្តប់ទៅដោយពណ៌មាសលើចំងាយផ្លូវដ៏វែងដាច់កន្ទុយភ្នែក ពិសារអាហារ និងភេសជ្ជៈដ៏ឈ្ងុយឆ្ងាញ់បែបប្រពៃណីតាមការប៉ិនប្រសប់នៃចុងភៅនៅតាមប្រទេសនីមួយៗព្រមទាំងបានផ្លាស់ប្តូរនូវគំនិតយោបល់រវាងប្រជាជន និងអ្នករួមដំណើរមួយចំនួនផងដែរ ។ គាត់បានរៀបរាប់នូវអារម្មណ៍រំភើបដោយបានឆ្លងកាត់ប្រទេសធំៗចំនួនដប់ដូចជាប្រទេសស្វីស Switzerland ប្រទេសអាឡឺម៉ង់Germany ប្រទេសអូទ្រីស Austria សាធារណៈរដ្ឋឆែក Czech Republic ប្រទេសប៉ូឡូញ Poland ប្រទេសបេឡារុស Belarus ប្រទេសរុស្ស៊ី Russia ប្រទេសម៉ុងហ្គោលី Mongolia ប្រទេសចិន និងចុងក្រោយគឺប្រទេសវៀតណាម Vietnam ដែលនៅជាប់នឹងព្រំដែនជាមួយនឹងប្រទេសកម្ពុជាយើង ៕ (ចប់)



## ដំណឹងពីតុលាការជាន់ខ្ពស់ស្តីពីបណ្តឹង លោក ជា ឆោម និងគណៈកម្មាធិការវត្តឃោសនារាម

**រ៉ូដអាយឡិន** : លោក ជា ឆោម និងគណៈកម្មាធិការវត្តធម្មឃោសនារាម បានប្តឹងកាសែតខ្មែរប៉ុស្តិ៍ ផ្សាយចេញពីឆ្នេរខាងកើត ពីបទនិយាយមិនពិតពីចៅអធិការវត្ត ដែលមានទំនាក់ទំនងមិនប្រក្រតីកាលពីបីឆ្នាំមុន ឥឡូវនេះបានត្រូវបញ្ចប់ដោយកិច្ចព្រមព្រៀងរវាងមេធាវីទាំងដើមចោទ និងចុងចោទ ។ ខ្មែរប៉ុស្តិ៍ បានត្រៀមខ្លួនឡើងតុលាការ ដើម្បីបង្ហាញភស្តុតាងពីភាពពិតនៃព័ត៌មាន តែដើមចោទពុំបានបន្តបណ្តឹងរបស់ខ្លួននៅចំពោះមុខតុលាការតទៅទៀត ។ ករណីនេះត្រូវបានបញ្ចប់ជាស្ថាពរ ។